សារព័ត៌មាន ខ្មែរផុស ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការឿង Vol 07 Issue 144 - Dec 20th, 2013 - Jan 09, 2014

**Free**



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## បទសម្ភាសន៍

# វាចារលោក វាស្នា នួន នាឱកាសដាច់ឆ្នាំ២០១៣

**ដោយ : ពិន សំខុន**

យើងបានជួបនឹងលោក វាស្នា នួន ជាគណក្រុមប្រឹក្សាសាលាក្រុងឡូវែល នាឱកាសចុងឆ្នាំ២០១៣នេះផង នឹង




ឱកាសចុងអាណត្តិនៃការងារនៅសាលាក្រុងរបស់លោកទៀតផង ដើម្បីស្តាប់ទស្សនៈនៃមេដឹកនាំជាន់ខ្ពស់ដើមកំណើតខ្មែរ ចំពោះព្រឹត្តិការណ៍បច្ចុប្បន្ននិងអនាគតក្រុងឡូវែល ដែលជាតំបន់សម្បូរខ្មែររស់នៅច្រើនជាងគេនៃឆ្នេរខាងកើតស.រ.អា នេះ ។

**ខ្មែរផុស :** លោកនឹងបញ្ចប់អាណត្តិ

**តទៅទំព័រទី ២១**

# Merry Chrismas & Happy new year 2014

ក្នុងឱកាសបុណ្យចូលឆ្នាំថ្មី ឆ្នាំសកល២០១៤ និងខួបគម្រប់៧ឆ្នាំនៃសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក បុគ្គលិកទាំងអស់សូមជូនពរ លោក លោកស្រី ទទួលនូវសុវត្ថិភាព សុខភាពល្អបរិបូរណ៍ ប្រកបដោយការ រកស៊ីចម្រើន និងទទួលបានជោគជ័យគ្រប់ប្រការ ៕

Merry Christmas

# សូមស្វាគមន៍ឆ្នាំ២០១៤

**ដោយ : ពិន សំខុន**



ឆ្នាំ២០១៣បានខិតមកដល់ទីបញ្ចប់ ដើម្បីទុកកន្លែងឱ្យឆ្នាំ២០១៤ បំពេញតួនាទីថ្មីរបស់ខ្លួនឱ្យរឹតតែប្រសើរជាងឆ្នាំមុន ។ ខ្មែរផុស ស.រ.អា បានបំពេញតួនាទីរបស់ខ្លួនក្នុងនាមជាអ្នកផ្សាយព័ត៌មានផង និងជាពាណិជ្ជករផង យ៉ាងខំប្រឹងប្រែង រហូតដល់ទីចុងឆ្នាំ ដូចពាណិជ្ជករឯទៀតៗដែរ តើអ្វីខ្លះដែលខ្មែរផុសបានធ្វើនាងអំឡុងឆ្នាំ២០១៣នេះ ?

**១-ក្នុងតួនាទីជាអ្នកផ្សព្វផ្សាយព័ត៌មាន :** យើងតែងមានការយកចិត្តទុកដាក់ផលិតឱ្យគុណភាពទំព័រ និងអត្ថបទប្រសើរឡើងរៀងរាល់លើក ដែលធ្វើឱ្យលោកអ្នកអានទទួលបាននូវអារម្មណ៍ថា បានដឹងដំណឹងសំខាន់គ្រប់គ្រាន់ គួរឱ្យជឿបានមុនគេ ។ យើងផលិតអត្ថបទជាមួយ និងអ្នកសរសេរដោយមានការពិគ្រោះស្វែងរកនូវចម្លើយដល់អ្វីដែលអ្នកអានយើងចង់ដឹង ឬនៅខ្វះខាត ដើម្បីសម្រួលដល់ទំនាក់ទំនងរាល់ថ្ងៃនៅក្នុងសហគមន៍ ។ ជាទូទៅអត្ថបទរបស់ខ្មែរផុសចែកជាពីរជាច់គ្នា

**តទៅទំព័រទី២០**

# បុណ្យណូអែលនៅរដ្ឋម៉ាសាឈូសេត

**ដោយ : រីឆាដ ហូវជូន ញៀវ**

**ប្រែសម្រួលជាខេមរភាសាដោយ : សុខា**


Richard Howe Jr.

អ្នកស្នាក់អាស្រ័យសញ្ជាតិអង់គ្លេសជំនាន់ដើម ដែលតាំងលំនៅក្នុងរដ្ឋម៉ាសាឈូសេត មិនចូលចិត្តបុណ្យណូអែលឡើយ ។ ពួកគេស្ទើរតែចាត់ទុកបុណ្យនេះថាខុសច្បាប់ ។ ឆ្នាំ១៦៥៩ ខាងនីតិ

**តទៅទំព័រទី ១៥**

# Christmas in Massachusetts

**By Richard P. Howe Jr.**

The early English residents of Massachusetts disliked Christmas. They even made it illegal. In 1659 the legislature passed a law that required anyone caught celebrating Christmas to pay a fine. **Contunued to Page 15**



# ដំណើរតាមជើងសមុទ្រ "អាត់ឡង់ទិក"



សូមអានអត្ថបទនៅទំព័រទី ១៥

# $150 REBATE

## សងប្រាក់ $150មកវិញ

ចំពោះការទិញទូរស័ព្ទ"ស្មាត ហ្វូន"ដែលអ្នកបានជ្រើសយក

***Towards the smart phone of your choice!***

(terms and conditions apply)



Washington SAVINGS BANK

We give you more

Member FDIC / Member DIF

washingtonsavings.com

Free Gift: Customer will receive a free gift within 30 days after redeeming a "FREE GIFT Certificate", including a smart phone purchase receipt and newly activating the following combination of services after 08/15/2013: A monthly direct deposit of at least $1,000 from an unaffiliated third party that is income or government benefit based, at least one monthly automatic withdrawal/ payment that is not web or card based and repetitive in nature; and an active debit card with 12 or more completed purchases is eligible for a $150 rebate from a smart phone purchase from any vendor. Promotion ends 06/30/2014. Each depositor is insured by the FDIC to at least $250,000. All deposits above the FDIC insurance amount are insured by the Depositors Insurance Fund (DIF).

## ចុះឈ្មោះតាមអ៊ិនធឺណិត




Make deposits with your mobile device anytime, anywhere

ឆិកឃីងអេកខានទាំងអស់ គឺមិនយកកំរៃ

All checking accounts are **FREE**

- **No minimum balance** (មិនចាំបាច់មានលុយតម្កល់ទាបបំផុត)
- **No monthly service fees** (មិនគិតថ្លៃសេវាប្រចាំខែ)
- **Free designer debit card** (ទទួលបានដេប៊ីតខាតឌីសាញដោយឥតយកថ្លៃ)
- **Free online banking, mobile banking** (សេវាធនាគារតាមអ៊ិនធឺណិត និងទូរស័ព្ទចល័តឥតយកថ្លៃ
- **Nationwide surcharge free or ATM refunds** (មិនយកកំរៃបន្ថែមលើសេវាទូលំទូលាយ ឬសង ATM)

*(depending on type of account)*

## ទទួលបានរង្វាន់រាល់ថ្ងៃពីសកម្មភាពដែលអ្នកប្រើពីធនាគារ

## Also earn rewards for everyday banking activity!

*(example: e-statements, payments and debit card use)*



**Debit Cash Rewards**

រង្វាន់ជាប្រាក់សុទ្ធពីដេប៊ីតកាត



**Tune Rewards**

រង្វាន់ជាតន្ត្រី



**Interest Rewards**

រង្វាន់ជាការប្រាក់

Over 85 debit card designs!



washingtonsavings.com Member FDIC/Member DIF

# ចងចាំណែលសិន ម៉ាឌីបា ម៉ាន់ដេឡា


ណែល សុនម៉ង់ដែលឡា

**ដោយ : សុខា**

មិនខុសគ្នាពី ចច វ៉ាស៊ីនតោន បិតានៃប្រទេសអាមេរិក និងអាលប្រាហាមលីនខុនវីរៈបុរសក្នុងសង្គ្រាមស៊ីវិលអាមេរិក លោកណែលសិន ម៉ាឌីបា ម៉ាន់ដេឡា ត្រូវបានចាត់ទុកជាវីរៈបុរសសម្រាប់ប្រជាជនអាហ្វ្រិកខាងត្បូង និងជាសកល តាមរយៈការលះបង់តស៊ូរបស់លោកទល់នឹងរបបអាផាថេតប្រឆាំងការរើសអើងប្រកាន់សាសន៍ និងសម្បុរ។ លោកណែលសិនម៉ាន់ដេឡា ជាស្ថាបនិកប្រទេសដែលបំបាត់ការមើលងាយ និងភាពមិនស្មើគ្នាចេញពីសង្គមនៃប្រទេសនេះ។ លោកចំណាយពេល២៧ឆ្នាំក្នុងពន្ធនាគារនៅកោះរ៉ូបបិនមុនលោកក្លាយជាប្រធានាធិបតីនៃប្រទេសអាហ្វ្រិកខាងត្បូង។



នៅអាយុ៩៥ឆ្នាំ លោកម៉ាន់ដេឡា ទទួលមរណភាព។ ថ្ងៃទី៥ ខែធ្នូ ថ្ងៃចុងក្រោយដែលលោកនៅជាមួយយើង។ មរណភាពរបស់ ម៉ាន់ដេឡា ត្រូវបានទទួលការយកចិត្តទុកដាក់ និងចងចាំពីសំណាក់មនុស្សជាច្រើន ហើយក៏មានប្រារព្ធវកម្មវិធី ការថ្លែងសុន្ទរកថា ការពិភាក្សា ជុំវិញស្នាដៃ ការលះបង់ និងប្រយោគល្អៗដែលលោកបានលើកឡើងក្នុងដំណើរជីវិត និងការងាររបស់លោក។




ស្របគ្នានោះសមាគមវប្បធម៌ប្រទេសអាហ្វ្រិកក្នុងឡូវែល (African Cultural Association of Greater Lowell) សហការជាមួយសាធារណៈឆាធី(Lowell Community Charter Public School) បានប្រារព្ធកម្មវិធីមួយ ដើម្បីចងចាំណែលសិនម៉ាន់ដេឡា (A Memorial Event in Honor of Nelson Mandela 1918-2013) ។ កម្មវិធីនេះប្រព្រឹត្តទៅនៅថ្ងៃទី១៣ខែធ្នូឆ្នាំ ២០១៣ ក្រោមការចូលរួមពីតំណាងរាស្ត្រ អៃលីន ដូណាហ៊្យូ (Senator Eilene Donoghue) អភិបាលក្រុង

**តទៅទំព័រទី ១៦**

# ផ្ដួចផ្ដើមប្រព័ន្ធភ្ជាប់ទំនាក់ទំនងក្នុងសហគមន៍

## សន្និសីទប្រចាំឆ្នាំលើកទីមួយនៃប្រព័ន្ធផ្សព្វផ្សាយសង្គមក្នុងឡូវែល

**អត្ថបទដោយ : ជេម អសទីស**

**ប្រែសម្រួលដោយ : សុខា**

អង្គប្រជុំហៀបនឹងដល់ទីបញ្ចប់ស្ដែងចេញពីរយៈពេលបីម៉ោងនៃអង្គប្រជុំដែលរស់រវើក លោក ឌីក ហូវ(រីឆាដ ហូវ) បានបង្ហើបនូវសំណួរសាកសួរអំពីស្មារតីនៃអង្គប្រជុំទាំងមូលថាគួរដាក់ឈ្មោះអង្គប្រជុំនេះ ដោយដកពាក្យណាមួយចេញពីពាក្យដើមដែលមាន ហើយហៅអង្គសន្និសីទនេះថា សន្និសីទសង្គមឡូវែល ។ ហេតុផលគឺគោលបំណងសំខាន់ដែលក្ដោបអង្គសន្និសីទ គឺផ្ដោតទៅលើមធ្យោបាយដែលមនុស្សទាំងអស់ក្នុងសហគមន៍បានភ្ជាប់ទំនាក់ទំនង និងកាន់តែស្គាល់គ្នា។ សម្រាប់ក្រុមដែលតែងតែតាមដានស្និតរមួតពីការប្រព្រឹត្តទៅនៃឡូវែលមានយ៉ាងហោចណាស់ក៏៥០ក្រុម បានប្រមូលផ្តុំគ្នានៅអិល ធី ស៊ី នាព្រឹកថ្ងៃទី៧ ធ្នូឆ្នាំ ២០១៣ ហើយពិភាក្សាជុំវិញប្រធានបទធ្វើយ៉ាងណាឱ្យសហគមន៍បានភ្ជាប់ទំនាក់ទំនងគ្នាយ៉ាងស្អិតរមួត ។

សន្និសីទប្រចាំឆ្នាំនៃប្រព័ន្ធផ្សព្វផ្សាយសង្គមក្នុងឡូវែល ទើបតែកើតថ្មីក្រោមស្នាដៃបង្កើតឡើងដោយលោក ឌីក ហូវ ជាមន្ត្រីចុះបញ្ជីអចលនវត្ថុ ហើយក៏ជាអ្នកនិពន្ធកិត្តិយសនៅសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក ព្រមទាំងជាស្ថាបនិកគេហទំព័រ richardhowe.com ។ លោកផ្ដោតអារម្មណ៍ទៅលើព្រឹត្តិការណ៍ក្នុងតំបន់ក្នុងនោះមាននយោបាយតំបន់ប្រវត្តិសាស្ត្រ និងព័ត៌មាន ។

សន្និសីទនាថ្ងៃនោះ ចែកចេញជាបួនផ្នែក ហើយផ្តល់មូលន័យសំខាន់ទៅលើមធ្យោបាយដែលមានប្រសិទ្ធភាពដែលរូបវ័ន្តបុគ្គល និងអង្គការនានាបានភ្ជាប់ទំនាក់ទំនងសង្គមជាមួយគ្នាក្នុងទិសដៅបង្កើតភាពជិតស្និទ្ធក្នុងសហគមន៍ ។

ពីរក្រុមដំបូងនៃវាគ្មិនទំនងមានធម្មជាតិជាក្រុមបច្ចេកទេសក្នុងនោះមានយូវ៉ានី បាអេស្ស អេមីល គូរវីឡា, និង លីហ្ស ស្ម៊ីត ពិភាក្សាទៅលើមធ្យោបាយទាំងឡាយដែលអាចប្រើបានក្នុងការប្រាស្រ័យ ឬភ្ជាប់ទំនាក់ទំនងក្នុងនោះមាន Twitter ដែលអាចបម្រើកិច្ចការផ្ទាល់ខ្លួន និងការងារ។ ក្រុមទី២ រួមមាន ដេញូល ម៉ាក់ហ្វេដជិន , ខារ៉ូលីន ហ្គាឡាហ្គឺ , ហ្វីល លូបស៊ីកហ្ស និង ចេសស៊ីកា វីលសុន ពិភាក្សាទៅលើសារៈសំខាន់ និងឥទ្ធិពលនៃវីដេអូ។ វីលសុន ជាអ្នក

តទៅទំព័រទី ១៥



អ្នកចូលរួមក្នុងសន្និសីទ




# Fostering a Socially Connected Community

## 1st Annual Lowell Social Media Conference

By James Ostis

Towards the tail end of the lively three hour discussion, Dick Howe wondered if the first ever Lowell Social Media Conference should have maybe had a different name. "Maybe we should have dropped a word and just called it the Lowell Social conference, because ultimately we're just talking about the ways people connect with each other." For a group of over 50 onlookers at LTC Lowell, the morning of December 7th was all about making those community connections.

The Lowell Social Media Conference was the brainchild of Dick Howe, Registrar of Deeds, KhmerPostUSA contributor, and founder of richardhowe.com, the area's prominent "hyperlocal" blog focused on Lowell politics, history, and news. The conference was divided in four segments and centered on the ways individuals and organizations can best utilize social media for the purposes of community engagement.

The first two panels were more technical in nature. Yovani Baez, Emil Kuruvilla, and Liz Smith talked about the variety of ways to use Twitter both personally and **Continued to Page 15**



The second panel talked about video

# ធុងសម្រាប់ដាក់កាកសំណល់ ផលិតឡើងវិញបានមកដល់!

**អត្ថបទដោយ : ហ្គាន់ធ្យើរ វែលឡិនស្តែន**

ដូចការព្រៀងទុកតាមកាលវិភាគការគ្រប់គ្រងសំរាមបានស្តុកធុងសម្រាប់ដាក់កាកសំណល់ផលិតឡើងវិញ សម្រាប់ការចែកចាយដល់ប្រជាជនតំបន់ឡូវែល ចាប់ផ្តើមនៅថ្ងៃទី២ធ្នូ ។ ការកែ


Gunther Wellenstein

ឆ្នៃថ្មីនឹងត្រូវបានបញ្ជូនទៅកាន់បាច់ដំបូងនៃ ២៥.០០០គ្រួសារ ។ ទាំងអស់តែមួយគ្រួសារ, ពីរ និង បី និងផ្ទះចំនួនបួនគ្រួសារ (ជាមួយរទេះសំរាមទីក្រុង Burgundy ) នឹងទទួលបានរទេះកង់ពណ៌បៃតងដោយស្វ័យប្រវត្តិមួយសម្រាប់គ្រួសារតែមួយពីរសម្រាប់ពីរ និងបន្តបន្ទាប់ ។ កិច្ចការនេះអាចចំណាយបីសប្តាហ៍កន្លះសម្រាប់ចែកចាយផ្នែកទាំងអស់នៃទីក្រុង។ សូមមេត្តាអត់ធ្មត់ ។ ការចែកធុងសម្រាប់ដាក់កាកសំណល់ផលិតឡើងវិញនេះត្រូវបានរំពឹងទុកថា ការចែកចាយទាំងអស់នឹងត្រូវបានបញ្ចប់មុនពេលបុណ្យណូអែល ។

ពាក់កណ្តាលនៃធុងមានគម្របពណ៌បៃតង ពាក់កណ្តាលផ្សេងទៀត គឺគម្របពណ៌ខៀវ។ ចំនួនពាក់កណ្តាលនៃគ្រួសារទាំងអស់នឹងទទួលបានធុងមានគម្របពណ៌ខៀវឯពាក់កណ្តាលទៀតនឹងទទួលបានធុងមានគម្របពណ៌បៃតង។ ពណ៌នៃគម្របខុសគ្នា គឺដើម្បីសម្គាល់ថ្ងៃដែលធុងត្រូវភីកអាប់។ ធុងមានគម្របពណ៌ខៀវត្រូវបានភីកអាប់នៅថ្ងៃផ្សេងគ្នាពីធុងមានគម្របពណ៌បៃតង។ សប្តាហ៍ដំបូងនៃខែមករា (បន្ទាប់ពីថ្ងៃឈប់សម្រាកចូលឆ្នាំថ្មីនៅថ្ងៃពុធ ទី១ ខែមករា ) នឹងក្លាយជាសប្តាហ៍ពណ៌បៃតងអមដោយសប្តាហ៍ពណ៌ខៀវ។ ជារៀងរាល់សប្តាហ៍ទៀតការប្រមូលការកែឆ្នៃនឹងបន្តជំនួសពណ៌បៃតង និងពណ៌ខៀវ។ សម្រាប់ការភីកអាប់ សំរាម, ការប្រមូលនឹងត្រូវបាន bumped ត្រឡប់មកវិញ មួយថ្ងៃក្នុងអំឡុងពេលកាលវិភាគថ្ងៃឈប់សម្រាក ។

កម្មវិធីថ្មីនេះនឹងមិនបន្ថែមការចំណាយណាមួយលើវិក័យប័ត្រសម្រាប់ទុកដាក់កាកសំណល់រឹងរបស់អ្នកស្រុក ។ នៅក្នុងនិទាឃរដូវនេះការប្រមូលសំរាមក្នុង yard - curbside ប្រចាំសប្តាហ៍នឹងបន្តដូចពេលមុន។ ផ្ទាំង គឺអាចរកបានដោយឥតគិតថ្លៃនៅសាលាក្រុង និង DPW នៅ ១៣៦៥ ddlesex ផ្លូវ ) ។ **តទៅទំព័រទី ២៥**

# Single-Stream Recycling Carts are Here

**By Gunther Wellenstein**

Right on schedule, Waste Management has stockpiled wheeled carts for distribution to eligible curbside collection customers. Beginning Dec 2nd, new recycling carts will be delivered to the first batch of 25,000 households. All single-family, duplex, and three- and four-family homes (with city burgundy trash carts) will automatically receive a green wheeled cart; one for a single-family, two for duplex, and so on. It may take the better part of 3 1/2 weeks for all sections of the city to receive their carts. Please be patient. It is anticipated that all deliveries will be completed before Christmas.

Half the carts were ordered with green lids, the other half with blue lids. Each of the city's five trash days were divided in half. About 2,500 households that have their trash picked up on Mondays will receive a green lid, the other half a blue lid. **Contunued to Page 25**

## ធុងសម្រាមដាក់ "កាកសំណល់យកទៅផលិតឡើងវិញ"

**នឹងមកដល់នៅដើមខែ ទៅពាក់កណ្តាលខែធ្នូ**
**សូមសរសេរអាស័យដ្ឋានរបស់អ្នកលើធុងនោះឲ្យបានច្បាស់លាស់**
**សូមចាប់ផ្តើមប្រមូល "កាកសំណល់យកទៅផលិតឡើងវិញ" ទុកដាក់ឲ្យបានស្អាត**



























**រួមគ្នា... "ចាប់ផ្តើមទាំងអស់គ្នាថ្ងៃនេះ" !**

ក្រដាសនានា

ក្តារក្រដាស

សំបុត្រចាស់ៗ

ដប / ធុង ប្រដាប់ប្រដាប្លាស្ទិក

ប្រអប់/កាដុងក្រដាស់ស្តើងៗ

ដប និងក្រឡកែវ

កំប៉ុង / របស់ អាលុយមីញ៉ូម

កាសែត(រាប់ទាំងពាណិជ្ជកម្ម ដែលនៅខាងក្នុង)

**www.LowellRecycle.org**

**សូមកុំទុកធុងលើចិញ្ចើមថ្នល់ ដល់ខែមករា !**

# ចម្រៀងជូនពរថ្ងៃបុណ្យគ្រីស្តម៉ាស និងឆ្នាំសកល ២០១៤

## We wish you a Merry Christmas

MERRY CHRISTMAS




ដោយ : សុខា

សារព័ត៌មានខ្មែរផុស្តសហរដ្ឋអាមេរិក សូមអញ្ជើញលោកអ្នកអានរីករាយនូវបទចម្រៀងមួយបទទៀត ដែលមានអត្ថន័យជូនពរអ្នកជាទីស្រឡាញ់របស់លោកអ្នកឱ្យបានសេចក្តីសុខជោគជ័យគ្រប់ភារកិច្ចមានពេលវេលាដ៏វិសេសក្នុងថ្ងៃគ្រីស្តម៉ាសព្រមទាំងឆ្នាំថ្មីដែលពេញដោយសេចក្តីសប្បាយរីករាយ ។

We wish you a Merry Christmas
We wish you a Merry Christmas
We wish you a Merry Christmas
And a Happy New Year.

We wish you a Merry Christmas
We wish you a Merry Christmas
We wish you a Merry Christmas
And a Happy New Year.

Good tidings we bring
To you and your king
Good tidings for Christmas
And a happy new year.

We wish you a Merry Christmas
We wish you a Merry Christmas
We wish you a Merry Christmas
And a Happy New Year.

Good tidings we bring.
To you and your king
Good tidings for Christmas
And a happy new year.

We wish you a Merry Christmas
We wish you a Merry Christmas
We wish you a Merry Christmas
And a Happy New Year.

We wish you a Merry Christmas
We wish you a Merry Christmas
We wish you a Merry Christmas
And a Happy New Year.

We wish you a merry Christmas
And a happy new year.



# បាតុកម្មថ្មីផ្ទុះប្រឆាំងវត្តខាងលើ

**ដោយ : ពិន សំខុន**

**ឡូវែល:** ក្នុងឱកាសបញ្ចប់បុណ្យផ្កាវត្តត្រៃរតនារាមខាងក្រោមថ្ងៃទី ៨វិច្ឆិកា ២០១៣ នៅភោជនីយដ្ឋានសំពៅមាស គណកម្មការវប្បធម៌ខ្មែរដំណាងដោយលោក ចាន់ថា គីម ជាប្រធាននឹងលោក សែម មាស ជានាយកប្រតិបត្តិបានបើកអង្គប្រជុំចំពោះមុខយាយតានឹងពលរដ្ឋប្រមាណ ២០០នាក់ ដើម្បីរាយការណ៍ពីសកម្មភាពបង្រួបបង្រួមវត្តលើវត្តក្រោមឱ្យត្រឡប់មកជាវត្តត្រៃរតនារាមតែមួយវិញ កិច្ចប្រជុំនោះបានបញ្ចប់ដោយក្រុមប្រជាជនបបួលគ្នាទៅធ្វើបាតុកម្ម ។



គីម ចាន់ថា

គីម ចាន់ថា និយាយក្នុងអង្គប្រជុំថា គណកម្មការវត្តខាងលើមិនមានឆន្ទៈបង្រួមវត្តនៅឡូវែលមួយនេះឱ្យក្លាយជាវត្តតែមួយដូចដើមវិញទេ បើទោះជាយើងបានធ្វើសេចក្តីអញ្ជើញជាលាយលក្ខអក្សរទៅជូនគណកម្មការវត្តលើទាំងមូលច្រើនដងឱ្យមកបង្ហាញឆន្ទៈជាសាធារណហើយក៏ដោយ ។ រីឯលោក សាន ប៊ិន ប្រធានគណកម្មការវត្តក្រោមបានចូលរួមជាតំណាងវត្តក្រោមនាឱកាសប្រជុំសាធារណ២ដងចុងក្រោយនេះ បានប្រកាសក្នុងន័យថា "មិនមានជំទាស់នឹងការរៀបចំវត្តឱ្យមានការគ្រប់គ្រងថ្មីទេ តែត្រូវមានសេចក្តីស្នើជាក់លាក់មិនឱ្យមានការភូតភរលោកតទៀតទេ ហើយលោកក៏មិនចង់ឃើញវត្តសហគមន៍ព្រះសង្ឃខ្មែររបស់ព្រះតេជគុណ សៅ ឃន លូកដៃមកជាមួយគណកម្មការវត្តលើដែរ" ។ ចំណែកឯគណកម្មការវត្តខាងលើបានបង្ហាញឆន្ទៈប្រាប់ខ្មែរផុសកាលពីដើមខែមុនថា "ចង់ឃើញវត្តត្រៃរតនារាមទៅជាវត្តតែមួយ តែត្រូវឱ្យគណកម្មការទាំងអស់លាលែងជាមុន ហើយមិនត្រូវឱ្យមកឈរឈ្មោះឡើងវិញទេ" ស្រាប់តែមានការនាំដំណឹងពីលោក រិទ្ធី អ៊ុង មនុស្សសំខាន់នៃគណកម្មការវត្តលើមកជូនអង្គប្រជុំនៅភោជនីយដ្ឋានសានីជាកាលពីពាក់កណ្តាលខែមុនថា "គ្មានការចរចាអ្វីទៀតទេ ហើយបើចង់ចរចារណាស់ត្រូវទៅជជែកជាមួយមេធាវីរបស់លោក" ។ នៅមានការស្នើជាសម្ងាត់របស់តំណាងវត្តលើទៅតំណាងវត្តក្រោមអំពីរូបមន្តដែលថា អាចនឹងទទួលការស្រុះស្រួលគ្នាបានតែវត្តក្រោមនិយាយថា រឿងរបៀបនេះកើតមានច្រើនដងមកហើយ តែមិនអាចយកជាការបានដោយសារនយោបាយមិនពិតនឹងគ្មានការទទួលខុសត្រូវ ដូច្នេះ "ត្រូវឱ្យមានការធានាថា សំណើរទាំងឡាយ គឺជាការពិត" បានន័យត្រូវសរសេរជាលាយល័ក្ខអក្សរ ចុះហត្ថលេខាដោយគណកម្មការវត្តលើទាំងមូល ឬក៏មានការតែងតាំងអាជ្ញាកណ្តាលសម្រាប់ដឹកនាំការចរចារឱ្យទៅដល់ទីបញ្ចប់បាន ។



សែម មាស









នៅពេលកំពុងរង់ចាំ រូបមន្តស្រុះស្រួលគ្នា វត្តនៅតែមិនអាចបើកទ្វារទទួលពុទ្ធសាសនិកបាន ព្រះសង្ឃនឹងគណកម្មការយាយតានៅវត្តលើហាក់ដូចជារីករាយនឹងជ័យជំនះដ៏តូចមួយដោយបានរស់នៅទីតាំងក្នុងកុដិតូចមួយ២៥ ផ្លូវគ្លីយលី ដែលអាជ្ញាធរមិនបានបិទទ្វារទុកឱ្យព្រះសង្ឃ គណកម្មការនឹងយាយតាវត្តក្រោមអនាថាតាមគេហដ្ឋានញាតិញោមពុំដឹងថ្ងៃណានឹងចប់ត្រឡប់មកវត្តវិញបាន។ មានសមាជិកគណកម្មការវត្តលើមួយចំនួនដែរដែលមកចូលរួមប្រជុំបញ្ចេញយោបល់នឹកអាណោចអាធម្មដល់វត្តខ្មែរដែលបែកបាក់គ្នាជាពីរតែដោយគ្មានការតែងតាំងឱ្យមកជាតំណាងអ្វីមួយនោះ បានត្រឹមតែបង្ហាញការឈឺចាប់រួមពុំបាននាំឱ្យទៅដល់ដំណោះស្រាយជាក់ស្តែងបានឡើយ ។

ការឈឺចាប់រួមរបស់ពលរដ្ឋខ្មែរនៅឡូវែលនេះ បានបណ្តាលឱ្យមានការទាមទារមួយ នាថ្ងៃប្រជុំនោះឱ្យគណកម្មការវត្តលើចេញមកបង្ហាញឆន្ទៈចំពោះការបង្រួបបង្រួមវត្តខ្មែរមួយនេះដោយបញ្ឈប់ការប្តឹងប្តល់ដែលបានចាយវាយប្រាក់ពលរដ្ឋរាប់លានដុល្លាទៅហើយ ។ នៅលើអាជ្ញាប័ណ្ណវត្តការប្តឹងប្តល់ដណ្តើមកម្មសិទ្ធវត្តពីវត្តសហគមន៍ព្រះសង្ឃខ្មែរទៅវត្តត្រៃរតនារាមដូចដើមវិញនេះ បានចូលដល់ដំណាក់ការបំផ្លាញសម្បត្តិប្រជាពលរដ្ឋឯងយ៉ាងគួរឱ្យខ្លាចទៅហើយ តែឥឡូវនេះមានជនក្បាលខូចនៅតែបន្តចំណាយថវិការវត្ត ដើម្បីបំបែកវត្តជា២ផ្ទុយនឹងបំណងព្រះសង្ឃយាយតានឹងផ្ទុយបំណងតុលាការដែលខ្លួនបានដាក់ពាក្យបណ្តឹងថែមទៀត យ៉ាងគ្មានរអែងសីលធម៌សោះទេ ។

ប្រជាពលរដ្ឋបាននាំគ្នាទៅលើកបដារស្រែកអាក្រោសធ្វើបាតុកម្មនៅកុដិមុខវត្តលើវេលាម៉ោង២រសៀលបាតុករនិយាយថា "មានព្រះសង្ឃមួយអង្គព្រះនាម លោក លាង បានចេញមកថតរូបបាតុករ ហើយចូលទៅវិញ ទំនងជាបានបានហៅប៉ូលីសឱ្យមកធ្វើអន្តរាគមន៍តែប៉ូលិសមិនបានហាមឃាត់អ្វីទាំងអស់ ពីព្រោះពុំមានប៉ះពាល់ដល់សន្តិសុខទេ" ។ បាតុកម្មបានបញ្ចប់ទៅវិញ ដោយគ្មាននរណាម្នាក់រងរបួសដោយអំពើហិង្សារឡើយ ក្រៅពីរបួសផ្លូវចិត្តដោយបានឃើញធម៌ខន្តីធម៌សទ្ធាបរិសុទ្ធបានចុះចាញ់ធម៌ទុច្ចរិត ដែលគ្រប់វត្តអារ៉ាមតែងហាមឃាត់ ៕

# ណោត ថាយអឺ អ្នកសារព័ត៌មានបរទេស សម្ភាសន៍ប៉ុលពត ទម្លាយរឿងសម្ងាត់

**ដោយ : ចេមស៍ អសទីស**

**ប្រែសម្រួលដោយ : សុខា**

ឆ្នាំ១៩៩៧ លោក ណោត ថាយអឺ ក្លាយជាអ្នកសារព័ត៌មានដំបូងដែលបានសម្ភាសន៍ ប៉ុល ពត បុគ្គលសំខាន់ក្នុងសម័យសម្លាប់រង្គាលប៉ុន្មានទសវត្សកន្លងទៅមកនេះ ។ កិច្ចសម្ភាសន៍ពិសេសរបស់លោកក្លាយជាកម្មវត្ថុដ៏សំខាន់ដែលខាងភ្នាក់ងារព័ត៌មានផ្សេងៗប្រាថ្នាចង់បាន ។ មិនបានប៉ុន្មានផង រឿងនេះក្លាយទៅជាសុបិន្តអាក្រក់មួយដែលលោកបានចោទប្រកាន់សារព័ត៌មាន អេ ប៊ី ស៊ី ថាលួចចន្ទូវកម្មសិទ្ធបញ្ញារបស់លោកដោយខុសច្បាប់។ បញ្ហានេះក៏ក្លាយទៅជារឿងបញ្ជូនទៅតុលាការ។ បន្ទាប់ពីភាពរ៉ាំរ៉ៃនៃដំណើរការក្តីអស់៧ឆ្នាំ ខាងសារព័ត៌មាន អេ ប៊ី ស៊ី បានព្រមព្រៀងសងសំណងដល់ណោត ថាយអឺ ក្នុងលក្ខខណ្ឌតម្រូវឱ្យ ណោត ថាយអឺ បញ្ឈប់ការបញ្ចេញមតិអំពីរឿងនេះជាសាធារណៈម្តងទៀត។ ក្នុងគេហទំព័ររបស់ ណោត ថាយអឺ ថ្មីៗនេះបានស្តែងឱ្យដឹងជាអន្តរជាតិអំពីការបំពានលើការព្រមព្រៀងខាងលើ ហើយទីបំផុត ណោតថាយអឺ ក៏ផ្តើមបំភ្លឺរឿងរ៉ាវដែលកើតឡើង ដោយមិនមានការសោកស្តាយសំណងពី អេ ប៊ី ស៊ី សូម្បីបន្តិច។

**តទៅទំព័រទី ១៤**



NateThayer




Thayer Video Marked as ABC Exclusive

# Nate Thayer Breaks His Silence

In 1997, Nate Thayer became the first western journalist to interview Pol Pot in decades. His exclusive interview is the type of thing that news reporters dream of scoring. But Thayer soon felt that dream turn into a nightmare, as he alleged that ABC News illegally stole and redistributed his copyrighted work. The matter soon went to the courts and after seven years of legal wrangling, ABC paid Thayer a settlement in return for Thayer agreeing not to talk about the issue in public again. In a recent posting on his blog, Thayer "intentionally and without a scintilla of reservation or remorse" violated that agreement to finally tell his side of the story.

On December 8th, 2013, Thayer authored a blog post on http://natethayer.wordpress.com/ titled "How Ted Koppel and ABC TV Tried to Steal my Life Work." Thayer, a freelance journalist working in Cambodia during the 1990s, had interviewed Pol Pot in October 1997 for a story that appeared in the Far East Economic Review. His exclusive access to the Khmer Rouge leader, which also included video and photographs, was quickly sought by major American media companies. Ted Koppel and ABC's Nightline secured limited rights to use the video of Thayer's interview, but Thayer claims the company immediately exceeded the terms of their agreement and took credit for his work as an "ABC News Exclusive." So upset by this turn of events, Thayer refused to accept the Peabody Award he was granted for the story as a "correspondent for ABC Nightline."

Thayer is telling his story now despite the fact it puts his financial settlement from the news organization in jeopardy, citing the importance of free speech in journalism and the plight of freelance reporters who are often at a marked disadvantage when dealing with large multimedia conglomerates.

**KhmerPost USA, LLC**

សារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852

លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092

អ៊ីម៉ែល info@khmerpost.us

អានកាសែតនៅគេហទំព័រ www.khmerpost.us

តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម Advertising

អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*

លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |

អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ Editorials

និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*

(978) 942 - 1641 | rogerpin@khmerpost.us

**អ្នកនិពន្ធកិត្តិយស Contributed Writers:**

Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D. James Ostis

**ផ្នែកសោភ័ណភាពកាសែត Design Artist**

Heng Chhunleng

**ជំនួយការរដ្ឋបាល Administrative Assistant**

Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ទស្សនៈកិច្ចរបស់អនុប្រធានគណបក្សសង្គ្រោះជាតិមកកាន់សហរដ្ឋអាមេរិក

**ដោយ : អ៊ុំ លឿម**

**ហ្វីឡាដែលហ្វៀ :** អនុប្រធានគណបក្សសង្គ្រោះជាតិ និងជាអ្នកតំណាងរាស្ត្រជាប់ឆ្នោតមណ្ឌលកំពង់ចាម គឺលោក កឹម សុខា កាលថ្ងៃសុក្រ ទី០៦ ខែធ្នូ ឆ្នាំ ២០១៣ កន្លងមកនេះ បានមកជួបសំណេះសំណាលជាមួយសមាជិក-សមាជិកាអ្នកគាំទ្រជាច្រើនរូបនៅឯវត្ត "ព្រះពុទ្ធរង្សី" នាក្រុងហ្វីឡាដែលហ្វៀ ។



នេះជាដំណើរទស្សនៈកិច្ចលើកដំបូងរបស់អនុប្រធានគណបក្សសង្គ្រោះជាតិ បន្ទាប់ពីមានការបោះឆ្នោតលំដាប់ជាតិសម្រាប់នីតិកាលទី៥ នៅថ្ងៃទី២៨ ខែកក្កដា ឆ្នាំ២០១៣ កន្លងមកនេះ ។

ពុំមានឥស្សរជននយោបាយកំពូលរបស់បក្សរូបណាត្រូវបានអមដំណើរជាមួយអនុប្រធានបក្សប្រឆាំងរូបនេះឡើយ ប៉ុន្តែលោក កឹម សុខា ត្រូវបានហែរហមដោយអ្នកតំណាងរាស្ត្រ ទើបជាប់ឆ្នោតចំនួន៥រូបដែលមកពីបណ្តារដ្ឋផ្សេងៗ និងកាណាដាដែលក្នុងនោះរួមមានឯកឧត្តម ទូន យក់ដា មកពីកាណាដា ឯកឧត្តម ឈាង វ៉ោ , ឯកឧត្តម ទុក វ៉ាន់ច័ន្ទ, ឯកឧត្តម វេជ្ជបណ្ឌិត កែវ សម្បត្តិ មកពីរដ្ឋម៉ាសាឈូសេត និងឯកឧត្តម ពិន រតនា មកពីរដ្ឋតិចសាស់ ។ ក្រៅពីនោះសកម្មជន និងថ្នាក់ដឹកនាំបក្សប្រចាំ ទ្វីបអាមេរិកខាងជើង ក៏ត្រូវបានធ្វើដំណើរមកបណ្តារដ្ឋមួយចំនួន ដើម្បីចូលរួមក្នុងជំនួបនោះផងដែរ ។



ថ្លែងទៅកាន់អ្នកចូលរួមប្រមាណជាង៣០០ នាក់ លោក កឹម សុខា បានជំងថា : បច្ចុប្បន្នប្រទេសកម្ពុជាកំពុងតែប្រឈមនឹងគ្រោះថ្នាក់ធំៗចំនួនបី គឺបញ្ហាអំពើឈ្លានពានពីបរទេស, អំពើផ្តាច់ការពីសំណាក់រដ្ឋាភិបាលមកលើប្រជាពលរដ្ឋស្លូតត្រង់ និងបញ្ហាអំពើពុករលួយ ។ លោកបន្តថា: បច្ចុប្បន្ន គណបក្សប្រជាជនកម្ពុជាកំពុងតែភ័យស្លន់ស្លោរ ដោយសារការក្រោកឈរពីសំណាក់ប្រជាពលរដ្ឋ នៅគ្រប់ច្រកល្ហកទាំងអស់ ហើយប្រជាពលរដ្ឋទាំងនោះហ៊ានប្រើប្រាស់នូវសិទ្ធិជាពលរដ្ឋ ដើម្បីស្វែងរកនូវសេរីភាពដ៏ពិតប្រាកដមួយ...។

លោក កឹម សុខា បានបន្តដោយសុទិដ្ឋិនិយមថា : នៅឆ្នាំ២០១៣នេះតាមរយៈការងើបឈរពីសំណាក់ប្រជាពលរដ្ឋខ្មែរនោះ គណបក្សប្រជាជនកម្ពុជាពិតជាដល់ទីបញ្ចប់ ហើយលោកថ្លែងបែបថ្មកកំប្លែងថា: "កាលពីមុនបោះឆ្នោត លោក ហ៊ុន សែន បានប្រើប្រាស់ ស្បៀត សាមកុក របស់ចិន ដើម្បីបំបែកបំបាក់ក្រុមប្រឆាំងប្រយោជន៍ឈានទៅរកជ័យជំនះរបស់ខ្លួន ប៉ុន្តែលុះក្រោយ **តទៅទំព័រទី ២៦**

# សាលាក្រុងប្រារព្ធការស្វាគមន៍បុណ្យគ្រិស្តម៉ាស និងឆ្នាំថ្មី

ដោយ ចេមស៍ អសទីស
ប្រែសម្រួលដោយ : សុខា

កម្មវិធីស្វាគមន៍បុណ្យគ្រិស្តម៉ាស និងឆ្នាំថ្មី២០១៤ ប្រព្រឹត្តទៅនៅសាលាក្រុងក្នុងអណត្តិចុងបញ្ចប់របស់អភិបាលក្រុងផាទ្រិម មឺហ្វី លោកបានសម្រេចធ្វើកម្មវិធីនេះ ដែលចាត់ទុកជាកម្មវិធីពិសេសមួយក្នុងក្រុងឡូវែល។ ថ្ងៃទី១១ ខែធ្នូ ប្រជាជនប្រមាណ៣០០នាក់ បានអញ្ជើញមកកាន់សាលាក្រុងដើម្បីប្រារព្ធពិធីនេះទាំងអស់គ្នាជាមួយអ្នកជិតខាង **តទៅទំព័រទី ២២**


Henri The Magnificent    Mayor Patrick Murphy

# City Hall Holiday Spirit

By James Ostis

As one of the final public events during his term, Patrick Murphy ensured the Mayor's Holiday Reception was a uniquely Lowell event. On December 11th, a crowd of over 300 Lowell residents descended upon City Hall to celebrate the holiday season alongside neighbors and friends.

The menu for the reception consisted of primarily Asian cuisine from local businesses Eggroll Café, Viet Thai Restaurant, Brew'd Awakening Coffeehaus, and Café Pastiche. City Councilor Vesna Nuon lent a hand by bringing some Cambodian style beef-skewers to the party as well. Entertainment was provided by the Lowell High School Fine Arts Department and the famous magician Henri the Magnificent.

Patrick Murphy chose not to run for re-election in 2013 and is leaving office in January after serving two years as mayor and two years on the city council before that. During his time in public office, Mayor Murphy has made a particular emphasis to reach out to the Cambodian American population in Lowell-perhaps most famously spearheading the successful effort to restore the nighttime lighting at the Pailin Volleyball courts at Clemente Park. The vibrant, diverse crowd attending the traditionally staid holiday reception was a true testament to Murphy's inclusionary tenure.


A crowd of over 300 enjoys the food from Eggroll Cafe and Viet Thai


Lowell High School Students provided music

# ករណីភិក្ខុ ញ៉ែម គឹមតេង ទៅស្រុកខ្មែរ

**ខ្មែរផុស ស.រ.អា**

បន្ទាប់ពីខ្សែវីដេអូបង្ហាញពីព្រះសង្ឃ ញ៉ែម គឹមតេង រួមភេទជាមួយនារីជើងវត្តម្នាក់ដែលទៅបំរើនៅវត្តខ្មែរឡូវែលសហគមន៍ខ្មែរក្នុងតំបន់បានប្តឹងឱ្យ


ព្រះសង្ឃ ញ៉ែម គឹមតេង

ព្រះចៅអធិការ សៅ ឃន នៃវត្តឡូវែល និងចៅអធិការវត្តសហគមន៍ព្រះសង្ឃខ្មែរចាប់ផ្សឹកភិក្ខុប្រព្រឹត្តផ្ទុយពីវិន័យព្រះសង្ឃចេញពីបព្វជិត ។ តែសេចក្តីសម្រេចរបស់គណសង្ឃាចសង្ឃចំនួន៥អង្គបានប្រកាសថា "រឿងនៅក្នុងខ្សែវីដេអូឯកសារជាវីដេអូកាត់តជារឿងមិនពិត ។ ដូច្នេះហើយពុំមានការចោទប្រកាន់ណាមួយដល់ភិក្ខុ ញ៉ែម គឹមតេង ទេ ។ ប្រជាពលរដ្ឋមិនបានសុខចិត្តទទួលសេចក្តីប្រកាសរបស់គណសង្ឃាចសង្ឃនៅបរទេសនោះទេ ដោយគេថា "រឿងច្បាស់ប៉ុណ្ណឹង ហើយនៅតែកាន់ជើងភិក្ខុកំហូចនោះទៀត" ហើយក៏បន្តបញ្ជូនពាក្យបណ្តឹងទៅក្រសួងធម្មការកម្ពុជាដែលមានលោក មិន ឃិន ជារដ្ឋមន្ត្រី ។

ថ្ងៃទី២៥ វិច្ឆិកា ២០១៣ នេះ ក្រសួងធម្មការបានទទួលស្គាល់ថា ញ៉ែម គឹមតេង បានប្រព្រឹត្តអំពើអាណាចារនៅក្នុងវត្តមែន ហើយក៏ស្នើទៅសម្តេចមួងរ៉ា ជាលេខាធិការថេរភា "ឱ្យចាត់វិធានការផ្សឹកព្រះសង្ឃព្រះនាម ញ៉ែម គឹមតេង តាមផ្លូវវិន័យឱ្យបាន


ព្រះចៅអធិការ សៅ ឃន

ធ្ងន់ធ្ងរ" តាមពាក្យបណ្តឹងរបស់តំណាងពលរដ្ឋខ្មែរ និងពុទ្ធបរិស័ទនៅទីក្រុងឡូវែលរដ្ឋម៉ាសាឈូសេត ។

នៅថ្ងៃទី១៩ វិច្ឆិកា ក្រសួងធម្មការបានចេញសេចក្តីសម្រេចមួយទៀត ព្យួរតួនាទីព្រះ តេជគុណ ញ៉ែម គឹមតេង បច្ចុប្បន្នជាប្រធានផ្នែកពុទ្ធឧត្តមសិក្សានៃអគារធិការដ្ឋានពុទ្ធិកសិក្សាជាតិ-ផ្អាកប្រាក់បៀវត្សរ៍និងប្រាក់ឧបត្ថម្ភ ផ្សេងចាប់ពីខែ វិច្ឆិកា នេះតទៅ ។

ភិក្ខុ ញ៉ែម គឹមតេង ដែលពេលនេះគង់នៅប្រទេសពុំទាន់បានទទួលបញ្ជាឱ្យចាកសិក្ខាបទពីអង្គការសាសនាព្រះពុទ្ធថ្នាក់ខ្ពស់ណាមួយនៅឡើយទេ -ដូច្នេះគេរង់ចាំសេចក្តីសម្រេចថានឹងមានការផ្សឹក ឬក៏គ្មាននេះពីសម្តេចសង្ឃទាំងពីគណៈតែប៉ុណ្ណោះ ៕

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សុក្រ ទី១៣ ខែធ្នូ ឆ្នាំ២០១៣

# ក្រុមអ្នកតវ៉ាបន្តសកម្មភាពប្រមូលផ្តុំ និងដង្ហែក្បួននៅក្នុងរាជធានីភ្នំពេញ

**ដោយ:** Mech Dara - December 12, 2013

ក្រុមអ្នកតវ៉ាមួយក្រុមតូចដែលត្រូវបានបង្ខំឱ្យចាកចេញពីសួនច្បារមុខស្ថានទូតសហរដ្ឋអាមេរិកកាលពីយប់ថ្ងៃអង្គារបានបន្តអំពាវនាវឱ្យរដ្ឋាភិបាលចុះចេញពីតំណែងកាលពីម្សិលមិញ ដោយលើកនេះ ក្រុមនេះបានជួបជុំគ្នានៅមុខស្ថានទូតបារាំង និងដើរក្បួនជុំវិញរាជធានីភ្នំពេញ។ មន្ត្រីនគរបាលចរាចរម្នាក់ព្យាយាមបញ្ឈប់រ៉ឺម៉កដែលដឹកឧបករឧគ្ឃោសនសព្ទពីក្រុមអ្នកតវ៉ាក្នុងរាជធានីភ្នំពេញ កាលពីម្សិលមិញដែលបានអំពាវនាវឱ្យលោក ហ៊ុន សែន ចុះចេញពីតំណែង។ ស៊ីវចាន់ណា ក្រុមអ្នកតវ៉ាដែលមានសមាជិកវ័យចំណាស់ប្រហែល១២នាក់ ត្រូវបាននាំខ្លួនទៅវត្តមួយក្នុង ខណ្ឌឫស្សីកែវ កាលពីយប់ថ្ងៃអង្គារ ដោយកម្លាំងសន្តិសុខខណ្ឌដូនពេញ បន្ទាប់ពីពួកគាត់បានចំណាយពេលនៅខាងក្រៅស្ថានទូតសហរដ្ឋអាមេរិក ក្នុងថ្ងៃទិវាសិទ្ធិមនុស្សអន្តរជាតិ។

លោក កែវ សាន អាយុ៦៤ឆ្នាំ តំណាងក្រុមអ្នកតវ៉ានេះ ដែលមានឈ្មោះហៅក្រៅថា ស្បៃវែង និយាយថា "អាជ្ញាធរចង់យកឧគ្ឃោសនសព្ទរបស់យើងទុក ក៏ប៉ុន្តែយើងមិនអាចបណ្តោយឱ្យពួកគេធ្វើបែបនេះបានទេ ហើយប្រសិនបើពួកគេមកយកវាយើងនឹងវាយបកពួកគេវិញ ពីព្រោះវា គឺជាវិធីតែមួយគត់ដែលយើងអាចប្រើប្រាស់ ដើម្បីផ្សព្វផ្សាយទស្សនរបស់យើង"។



លោកបានលើកឡើងបន្តទៀតថា "ពួកគេនិយាយថា សកម្មភាពដើរក្បួនរបស់ពួកយើង គឺជារឿងខុសច្បាប់ ហើយបានប្រាប់យើងឱ្យឈប់ដើរក្បួន។ ពួកគេមិនអនុញ្ញាតឱ្យពួកយើងទៅដល់គោលដៅរបស់ពួកយើងទេ ហើយចង់បាន

តទៅទំព័រទី ២៧

# Group of Rights Protesters Continue to Rally in Phnom Penh

**By Mech Dara - December 12, 2013**

A small group of protesters forcibly removed from the park opposite the U.S. Embassy on Tuesday night continued to call for the government to step down Wednesday, this time rallying in front of the French Embassy and marching around Phnom Penh.

The group of about 12 mostly elderly people were taken to a pagoda in Russei Keo district on Tuesday night by Daun Penh security guards after spending most of International Human Rights Day stationed outside the U.S. Embassy.

A representative of the group, 64-year-old Keo San, who also gave his name as Sbai Veng, said: "The authorities wanted to keep our loudspeaker, but we could not let them do it, and if they came to take it we would fight them back, because it is the only way that we could spread our view.

"They said that our march is illegal and told us to stop marching. They are not allowing us to get to our destination and want to take our loudspeaker, but we do not agree, and if they want it they will have to kill us first," he added.

The group claims to be aligned with the CNRP, though the party's head of public affairs, Mu Sochua, on Tuesday disassociated the party from their cause. They say they hope to challenge the government over the disputed July national election.

At 8 a.m. Wednesday, they were asked to move on from outside the French Embassy and made a stop at Wat Koh pagoda, which was blocked at about 11 a.m., where they were later joined by Phnom Penh deputy governor Khuong Sreng, as well as a contingent of commune and traffic police.

After two bouts of negotiation, the group was let out of the pagoda by six monks who said the authorities had no right to block the gate, and they traveled to Freedom Park after agreeing not to return to the French Embassy or visit the Japanese Embassy as they had planned.

**Continued to Page 13**

# ប្រទេសកម្ពុជាបាត់បង់ប្រាក់១៣០លានដុល្លារ ក្នុងមួយឆ្នាំៗដោយសារពាណិជ្ជកម្មខុសច្បាប់

**ដោយ** **Alex Willemyns - December 12, 2013**

យោងតាមរបាយការណ៍ដែលក្រុមហ៊ុនស្រាវជ្រាវហិរញ្ញវត្ថុសហរដ្ឋអាមេរិកមួយបានចេញផ្សាយក្នុងថ្ងៃនេះ បានបង្ហាញថា ប្រទេសកម្ពុជាបានបាត់បង់ប្រាក់ជាមធ្យម១៣៣លានដុល្លារក្នុងមួយឆ្នាំ ក្នុងចន្លោះពីឆ្នាំ២០០២ដល់ឆ្នាំ២០១១ ដោយសារតែមានបទល្មើសផ្សេងៗ ដូចជាសកម្មភាពគេចវេសមិនបង់ពន្ធលើទំនិញនាំចូល និងនាំចេញចលនារូបិយវត្ថុខុសច្បាប់ និងសកម្មភាពរត់ពន្ធទំនិញផ្សេងៗ។

របាយការណ៍ដែលមានចំណងជើងថា "រំហូរហិរញ្ញវត្ថុខុសច្បាប់ចេញពីប្រទេសកំពុងអភិវឌ្ឍន៍ពីឆ្នាំ២០០២ ដល់ឆ្នាំ២០១១" បោះពុម្ពផ្សាយដោយក្រុមហ៊ុន គ្លូបិល ហ្វៃណាន់សល អិនធិគ្រីតធី (Globol Financial Integrity) បានប៉ាន់ស្មានថា រំហូរចេញខុសច្បាប់នៃរូបិយវត្ថុពីប្រទេសកំពុងអភិវឌ្ឍន៍ក្នុងឆ្នាំ២០០១ មានចំនួនសរុបប្រហែល១០ដងនៃចំនួនទឹកប្រាក់ជំនួយដែលត្រូវបានចែកចាយទូទាំងសាកលលោកក្នុងឆ្នាំដដែលនេះ។

សេចក្តីប្រកាសព័ត៌មានអំពីរបាយការណ៍នេះមានខ្លឹមសារថា "រំហូរចេញនៃទឹកប្រាក់ចំនួន ៩៤៦.៧.០០០លានដុល្លារតាមច្រកខុសច្បាប់ក្នុងឆ្នាំ២០១១ គឺជាចំនួនទឹកប្រាក់បាត់បង់ដែលកើនឡើង១៣,៧ភាគរយ បើធៀបនឹងឆ្នាំ២០១០ដែលប្រទេសកំពុងអភិវឌ្ឍន៍បាត់បង់អស់៨៣២.៤.០០០លានដុល្លារ និងជាចំនួនទឹកប្រាក់បាត់បង់កាន់តែច្រើន បើធៀបនឹងឆ្នាំ២០១២ ដែលចំនួនទឹកប្រាក់ហូរចេញខុសច្បាប់មានសរុបតែ២៧០.៣.០០០លានដុល្លារប៉ុណ្ណោះ"។

សេចក្តីប្រកាសព័ត៌មានអំពីរបាយការណ៍ដដែលមានខ្លឹមសារបន្តទៀតថា "លទ្ធផលប៉ាន់ស្មាននៅក្នុងរបាយការណ៍សិក្សាស្រាវជ្រាវនេះបានបង្ហាញថា ប្រទេសកំពុងអភិវឌ្ឍន៍បាត់បង់ប្រាក់សរុបចំនួន៥.៩ពាន់ពាន់លានដុល្លារក្នុងរយៈ

តទៅទំព័រទី ១៣

# Illicit Trade Linked to $130M In Losses

**By Alex Willemyns - December 12, 2013**

A report released by a U.S. financial research firm today says that Cambodia lost an average of $133 million per year between 2002 and 2011 through crimes such as import and export tax evasion, illegal movements of money and smuggling.

The report, released by Global Financial Integrity and entitled "Illicit Financial Flows from Developing Countries: 2002-2011," estimates that the total amount of illicit outflows from developing countries in 2011 alone was about 10 times the amount of aid money disbursed globally in the same year.

"The US$946.7 billion of illicit outflows lost in 2011 is a 13.7 percent uptick from 2010-which saw developing countries hemorrhage US$832.4 billion-and a dramatic increase from 2002, when illicit outflows totaled just US$270.3 billion," a press briefing for the report says.

"The study estimates the developing world lost a total of US$5.9 trillion over the decade spanning 2002 to 2011."

"Poor countries have hemorrhaged nearly a trillion dollars from their economies in 2011 that could have been invested in local businesses, healthcare, education, or infrastructure. This is nearly a trillion dollars that could have been used to help pull people out of poverty and save lives," one of the report's co-authors, Brian LeBlanc, is quoted as saying.

The report represents the most up-to-date data on illicit outflows from developing countries.

Transparency International last week released its annual Corruption Perceptions Index, which ranked Cambodia as the 17th most corrupt country in the world.

Transparency International Cambodia executive director Preap Kol said that while his organization has not exhaustively investigated corruption at the country's borders, large-scale losses of money through illicit trade would not be surprising given the lax governance of trade.

"Cambodia is not immune to illegal and illicit trade, and within Southeast Asia, people could easily guess that Cambodia attracts such practices because of its weak rule of law and monitoring of such illicit acts," Mr. Kol said.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ម្យាប់ចេញផ្សាយថ្ងៃ សុក្រ ទី១៣ ខែធ្នូ ឆ្នាំ២០១៣

## លោក សម រង្ស៊ី លើកឡើងថា លោក ហ៊ុន សែន អន់ជាងស្ត្រី

ដោយ Alex Willemyns and Khuon Narim - December 12, 2013

កាលពីម្សិលមិញលោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំង និងស្ត្រីជាសមាជិកជាន់ខ្ពស់គណបក្សសង្គ្រោះជាតិបានថ្លែងការពារអ្វីដែលលោក សម រង្ស៊ី បានលើកឡើងអំឡុងការប្រមូលផ្តុំគ្នានៅក្នុងខេត្តសៀមរាប កាលពីថ្ងៃអង្គារថា លោក ហ៊ុន សែន "អន់ជាងមនុស្សស្រី"។

អំឡុងការប្រមូលផ្តុំគ្នាលើកដំបូងក្រោយការបោះឆ្នោតនៅក្នុងខេត្តនេះ លោក សម រង្ស៊ី បានចំអកឱ្យលោក ហ៊ុន សែន ដោយបានអំពាវនាវឱ្យលោកយកគំរូតាមនាយករដ្ឋមន្ត្រី យីងឡាក់ ស៊ីណាវ៉ាត្រា ដែលបានសម្រេចឱ្យមានការបោះឆ្នោតមុនកាលកំណត់កាលពីពេលថ្មីនេះ។ លោក សម រង្ស៊ី បានថ្លែងថា "ខ្ញុំសូមអំពាវទៅលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ។ លោក ហ៊ុន សែន អើយ កុំឱ្យអន់ជាងមនុស្សស្រី។ ហេតុអ្វីបានជាលោក ហ៊ុន សែន អន់ជាងមនុស្សស្រីអ៊ីចឹង"។

ការនិយាយចំអកនេះត្រូវបានបន្ទរដោយអ្នកគាំទ្ររបស់លោកជាច្រើនដែលបានដើរក្បួនកាត់ក្រុងសៀមរាប ដោយបានស្រែកថា "ហ៊ុន សែន អន់ជាងស្រី!"។ អ្នកស្រី មូរ សុខហួរ ប្រធានផ្នែកកិច្ចការសាធារណៈ និងជាអតីតរដ្ឋមន្ត្រីក្រសួងកិច្ចការនារីមកពីគណបក្សសង្គ្រោះជាតិបានបដិសេធថា សម្តីរបស់លោក សម រង្ស៊ី មិនមែនជាការប្រមាថចំពោះស្ត្រីភេទទេ។ អ្នកស្រីបានមានប្រសាសន៍ថា "លោកត្រូវបកស្រាយពីអ្វីដែលគាត់និយាយឱ្យត្រូវបរិបទ។ បរិបទទាំងមូលគឺថា នាយករដ្ឋមន្ត្រី យីងឡាក់ ស៊ីណាវ៉ាត្រា ទុកប្រយោជន៍ជាតិជាធំ ហើយគាត់មានឆន្ទៈចុះចេញពីតំណែងដើម្បីបញ្ចប់ជម្លោះនយោបាយ"។

អ្នកស្រី មូរ សុខហួរ បានអះអាងថា លោក សម រង្ស៊ី ចង់បានន័យថា លោក ហ៊ុន សែន គួរតែយកភាពរឹងមាំរបស់អ្នកស្រី យីងឡាក់ ជាគំរូ។ អ្នកស្រីបានមានប្រសាសន៍ថា "អ្វីដែលលោក សម រង្ស៊ី ចង់និយាយគឺថា គាត់ឱ្យអ្នកស្រី យីងឡាក់ គឺជាស្ត្រី។ ខ្ញុំតែងតែនិយាយថា នៅពេលដែលស្ត្រីធ្វើជាអ្នកដឹកនាំ ពួកគេគិតអំពីផលប្រយោជន៍ជាតិ។ ពេលស្ត្រីធ្វើការសម្រេចចិត្តក៏ដូចគ្នាដែរ គឺពួកគេគិតអំពីប្រយោជន៍រួម"។

អ្នកស្រីបានគូសបញ្ជាក់ថា "ប្រសិនបើគាត់និយាយថា ស្ត្រីអន់ជាងបុរសនោះ ខ្ញុំប្រាកដជាមិនអាចទទួលយកបានទេ ប៉ុន្តែខ្ញុំធ្វើការជាមួយគាត់យូរហើយខ្ញុំដឹងថា គាត់គ្មានថ្ងៃប្រើភាសាបែបហ្នឹងទេ"។ អ្នកស្រី កែ សុវណ្ណរតន៍ សមាជិកសភាជាប់ឆ្នោតរបស់គណបក្សសង្គ្រោះជាតិ និង

តទៅទំព័រទី ១៦

## Rainsy, CNRP Women Defend 'Weaker Than a Woman' Comment

**By Alex Willemyns and Khuon Narim - December 12, 2013**

Opposition leader Sam Rainsy and senior female members of the CNRP on Wednesday moved to defend the statement he made during a rally in Siem Reap on Tuesday that Prime Minister Hun Sen is "weaker than a female."

At the CNRP's first post-election rally in the province, Mr. Rainsy taunted Mr. Hun Sen by calling on him to follow Thai Prime Minister Yingluck Shinawatra's recent decision to call an early election.

"I appeal to Prime Minister Hun Sen; I ask one thing: Mr. Hun Sen, don't be weaker than a female," he said, adding, "Why is Hun Sen weaker than a female?" The gibe was taken up by many of his supporters, who marched through Siem Reap sporadically shouting, "Hun Sen, weaker than a woman!"

Mu Sochua, the CNRP's head of public affairs and a former minister of women's affairs, denied that Mr. Rainsy's comment was offensive to women.

"You have to put what he said in context. The full context is that Prime Minister Yingluck Shinawatra put the interests of her nation first and that she was willing to stand down to end a political conflict."

Ms. Sochua said that Mr. Rainsy meant that Mr. Hun Sen ought to draw on Ms. Yingluck's example of strength.

"What Mr. Rainsy is saying is that she is a woman. I've always said that when a woman leads, she thinks about the national interest. It's the same when a woman makes decisions, she thinks about the common interest."

"If he were to say 'Women are weaker than men,' I would not accept that from Mr. Sam Rainsy, but I work with him and I know he would never say that."

CNRP lawmaker-elect Ke Sovannaroth, the head of the opposition party's working group in Siem Reap, agreed that the comments were only intended to ask Mr. Hun Sen to emulate Ms. Yingluck's example.

"It wasn't offensive. He wanted to compare Prime Minister Hun Sen and Prime Minister Yingluck Shinawatra in terms of their bravery," Ms. Sovannaroth said.

Mr. Rainsy also said his comment was taken out of context and that he meant to show his respect for Ms. Yingluck rather than denigrate women.

"It's very rare to have a woman as a prime minister in this world. What I meant is that we admire Yingluck Shinawatra for her courage and dignity," he said.

"Even though she has no legal reason to stand down-she is the legitimate prime minister, she was democratically elected, and the opposition to her is weak-she stood down."

"She happens to be a woman. It just so happens that Hun Sen is less courageous," Mr. Rainsy said.

តមកពីទំព័រទី ១២

## ប្រទេសកម្ពុជាបាត់បង់ប្រាក់១៣០លានដុល្លារ...

ពេលមួយទសវត្សរ៍ពោល គឺគិតចាប់តាំងពីឆ្នាំ២០០២ដល់ឆ្នាំ២០១១"។ លោក ប្រាយអិន ឡឺប្លង់ (Brian LeBlanc) សហអ្នកនិពន្ធរបាយការណ៍នេះ ត្រូវបានដកស្រង់សម្តីថា "ប្រទេសក្រីក្របានបាត់បង់ប្រាក់ជិត១,០០០ពាន់លានដុល្លារពីសេដ្ឋកិច្ចរបស់ពួកគេក្នុងឆ្នាំ២០១១ ដែលគួរតែអាចត្រូវបានវិនិយោគទៅលើអាជីវកម្មក្នុងស្រុកសេវាថែទាំសុខភាពអប់រំ ឬក៏ហេដ្ឋារចនាសម្ព័ន្ធនេះ គឺជាទឹកប្រាក់១,០០០ពាន់លានដុល្លារ ដែលគួរតែអាចត្រូវបានប្រើប្រាស់ដើម្បីជួយប្រជាជនឱ្យងើបផុតពីភាពក្រីក្រ និងជួយសង្គ្រោះជីវិតរបស់ពួកគាត់"។

របាយការណ៍ដដែលក៏បានបង្ហាញពីទិន្នន័យថ្មីបំផុត ទាក់ទងទៅនឹងលំហូរចេញខុសច្បាប់នៃសាច់ប្រាក់ពីប្រទេសកំពុងអភិវឌ្ឍន៍។ អង្គការតម្លាភាពអន្តរជាតិ កាលពីសប្តាហ៍មុនបានចេញសន្ទស្សន៍យល់ដឹងអំពីអំពើពុករលួយប្រចាំឆ្នាំរបស់ខ្លួន ។សន្ទស្សន៍នេះបានបង្ហាញថា ប្រទេសកម្ពុជាឈរនៅចំណាត់ថ្នាក់លេខ១៧ដែលមានអំពើពុករលួយច្រើនបំផុតនៅលើពិភពលោក។

លោក ព្រាប កុល នាយកប្រតិបត្តិអង្គការតម្លាភាពអន្តរជាតិកម្ពុជាបានលើកឡើងថា ខណៈដែលអង្គការរបស់លោកមិនបានស៊ើបអង្កេតក្នុងកម្រិតជិតដល់បំផុតទៅលើអំពើពុករលួយនៅតាមតំបន់ព្រំដែននៃប្រទេសកម្ពុជានោះការបាត់បង់ប្រាក់ដ៏ច្រើនដោយសារពាណិជ្ជកម្មខុសច្បាប់មិនមែនជារឿងគួរឱ្យភ្ញាក់ផ្អើលទេ ដោយសារតែមានភាពធូររលុងក្នុងផ្នែកអភិបាលកិច្ចពាណិជ្ជកម្ម។

លោក ព្រាប កុល បានមានប្រសាសន៍ថា "ប្រទេសកម្ពុជាមិនសាំទៅនឹងពាណិជ្ជកម្មខុសច្បាប់ទេ ហើយនៅក្នុងតំបន់អាស៊ីអាគ្នេយ៍ប្រជាជនអាចទាញយ៉ាងងាយថា ប្រទេសកម្ពុជាមានសកម្មភាពបែបនេះ ដោយសារតែនីតិរដ្ឋរបស់ខ្លួនមានភាពទន់ខ្សោយ និងខ្វះការត្រួតពិនិត្យសកម្មភាពខុសច្បាប់បែបនេះ"៕ សុធា

Continued from Page 12

## Group of Rights Protesters

However, at 2 p.m., they were met by a group of protesters from the Boeng Kak community and headed back to the French Embassy, to the frustration of police, who tried but failed to herd them back to Freedom Park.

Deputy municipal police chief Chuon Narin said: "We had made an agreement that they would go back to Freedom Park, but now why have they changed their mind and want to go the French Embassy?"

Once there, the group delivered a petition calling for assistance in making the government "respect the law" and honor the 1991 Paris Peace Agreements.

"We do not have a legal government," one protester said.

Another protester, Ouk Pich Samnang, 55, said the group would continue to congregate at Wat Phnom, where at least 100 military police were stationed after they arrived.

"If we will keep silent, they will not care about us; therefore, we need to make our voices heard in order find justice for our people," he added.

# មនុស្សយន្តចិន យូធុ ចុះចតនៅឋានព្រះច័ន្ទ Chinese Robot "Yutu" lands on the Moon

**ដោយ : ចេមស៍ អសទីស**

**ប្រែសម្រួលដោយ : សុខា**

ថ្ងៃសៅរ៍ ទី១៤ ខែធ្នូ ឆ្នាំ២០១៣ អវកាសយានិកសិប្បនិម្មិតចិនដែលជាមនុស្សយន្តឈ្មោះ យូធុ បានចុះចតនៅតែមនៃព្រះច័ន្ទនេះផ្អែកតាមប្រភពភ្នាក់ងារពត៌មានប្រទេសចិន ។ ចិនបានក្លាយជាប្រទេសទីបី តាមប្រកៀកនឹងសហរដ្ឋអាមេរិក ព្រមទាំងសហភាពសូវៀតដែលចុះចតដោយរន្ថើននៅឋានព្រះច័ន្ទ( មានន័យថាសម្ភារៈទ្រទ្រង់ស្ថិតក្នុងស្ថានភាពមិនកែប្រែផ្អែកលើការចត) ។ យានដែលមានកង់៦ យូធុនេះក៏ត្រូវបានគេស្គាល់ថា ជាទន្សាយទេពដែលចុះចតនៅឋានព្រះច័ន្ទនៃជាតិសាសន៍ពិភពលោកប្រៀបនឹងកាលពីឆ្នាំ១៩៧៦ ។

ការចុះចតនេះចង្អុលឱ្យឃើញពីការអភិវឌ្ឍចុងក្រោយរបស់ប្រទេសចិនក្នុងរបកគំហើញផ្នែកអវកាស បន្ទាប់ពីដើរពីក្រោយអាមេរិក និងសូវៀតប៉ុន្មានឆ្នាំថ្មីៗនេះ ។ ឆ្នាំ២០០៣ ចិនបានបញ្ជូនអវកាសយានិកដំបូងរបស់ខ្លួនទៅលំហ ហើយចិនក្លាយជាប្រទេសទីបីដែលបានបញ្ជូនមនុស្សពិតប្រាកដធ្វើដំណើរទៅកាន់លំហ ។ ភ្នាក់ងារអវកាសចិនថ្មីៗនេះបានចាប់ផ្តើមធ្វើការស៊ើបអង្កេត និងធ្វើគម្រោងបកើនូវស្ថានីយ៍លំហអាកាសឱ្យបាននៅឆ្នាំ២០២០ ហើយបន្ទាប់មកនឹងបញ្ជូនអវកាសយានិកទៅព្រះច័ន្ទ ៕


Chinese Space Rover Yutu

On Saturday, December 14th, the Chinese unmanned space rover Yutu landed on the surface of the moon, according to the Chinese state news agency. China became the third country, following the United States and Soviet Union, to have a "soft-landing" on the moon (meaning the equipment remains intact upon landing). The six-wheeled Yutu, also known as Jade Rabbit, also marks the first lunar soft-landing by any nation since 1976.

The landing marks the latest in China's developing space program, which despite lagging behind the United States and Russia has made remarkable strides in recent years. In 2003, China sent its first astronaut into space, becoming the third country to independently launch manned space travel. The Chinese space agency has recently launched several lunar probes and plans to open a space station around 2020 and send an astronaut to the moon after that.

## តមកពីទំព័រ ៨ ណេត ថាយអឺ អ្នកសារព័ត៌មានបរទេស...

ថ្ងៃទី៨ខែធ្នូឆ្នាំ២០១៣ លោកណេត ថាយអឺ ជាអ្នកនិពន្ធក្នុងគេហទំព័រ http://natethayer.wordpress.com/ បានបង្ហោះក្នុងគេហទំព័រនេះនូវអត្ថបទមួយមានចំណងជើងថា " វិធីដែលធិដ ខូផផែល និងទូរទស្សន៍ អេ ប៊ី ស៊ី ព្យាយាមលួចស្នាដៃដែលខ្ញុំព្យាយាមធ្វើពេញមួយជីវិត" ។ លោកថាយអឺ ជាអ្នកសារព័ត៌មានហ្វ្រីឡែនស៍ ( មិនជាប់កុងត្រា) ដែលបានបំពេញការងារនៅប្រទេសកម្ពុជាអំឡុងទសវត្សរ៍៩០ ។ លោកបានសម្ភាសន៍ជាមួយ ប៉ុល ពត ឆ្នាំ១៩៩៧ ហើយផលិតជារឿងដែលចេញក្នុងកាសែត ហ្វារ អ៊ីស ខូស រីវីយូ ។ លទ្ធភាពចូលបានដល់ជិតប៉ុលពតដែលកម្រមាននេះ រាប់ទាំងរូបថត និងវីដេអូ មិនយូរប៉ុន្មានស្ថិតក្នុងក្រសែភ្នែករបស់ក្រុមហ៊ុនសារព័ត៌មានធំៗ ។ ធិត ខូផផែល និង អេ ប៊ី ស៊ី ណាយថឺឡាញ ផ្តល់នូវសុវត្ថិភាពផ្នែកកម្មសិទ្ធបញ្ញាដល់ណេត ថាយអឺ យ៉ាងមានកម្រិត ហើយណេតថាយអឺបានចោទប្រកាន់ភ្លាមៗអំពីការរំលោភលើខសន្យា ខណៈដែល អេ ប៊ី ស៊ី មិនបានផ្តល់កម្មសិទ្ធពេញចិត្តលើស្នាដៃរបស់ ណេត ថាយអឺ ហើយយកស្នាដៃនោះដាក់ជារបស់ អេ ប៊ី ស៊ី ទៅវិញ ដោយដាក់ចំណងជើងថា "អេ ប៊ី ស៊ី អ៊ិកឃ្លូសស៊ីវ" ។ ព្រឹត្តិការណ៍ក្លាយជារឿងដែលគួរឱ្យស្រងាកចិត្ត ហើយណេតថាយអឺ បដិសេធមិនព្រមទទួលយករង្វាន់ ផៀបាឌី ដែលគេផ្តល់ឱ្យលោកសម្រាប់រឿងឆ្លើយតបនឹង អេ ប៊ី ស៊ី ណាយថឺឡាញ ។



Original Article by Far East Economic Review

ថាយអឺធ្វើការបកស្រាយនូវរឿងរ៉ាវរបស់លោក ទោះបីជាសំណងផ្នែកហិរញ្ញវត្ថុក្លាយទៅជាអសារបង់ក៏ដោយសំដៅទុកជាទីអាងដល់សេរីភាពក្នុងការបញ្ចេញមតិខាងផ្នែកសារព័ត៌មាន និងស្ថានភាពដែលកើតឡើងចំពោះអ្នកសារព័ត៌មានមិនជាប់កុងត្រាដូចជារូបលោកដែលជារឿយៗតែងតែត្រូវបានគេងចំណេញពេលដែលធ្វើការជាមួយក្រុមហ៊ុនសារព័ត៌មានធំៗ ៕

តមកពីទំព័រទី ១

## បុណ្យណូអែលនៅរដ្ឋម៉ាសាឈូសេត...

បញ្ញត្តិបានចេញច្បាប់មួយផាកពិន័យដល់ជនណាដែលត្រូវបានរកឃើញថា ធ្វើការប្រារព្ធបុណ្យនេះ។ តើមូលហេតុអ្វីធ្វើឱ្យអ្នកស្នាក់អាស្រ័យសញ្ជាតិអង់គ្លេសជំនាន់ដើមមានឆន្ទៈប្រឆាំងទៅនឹងបុណ្យណូអែល ឬគ្រីស្តម៉ាស? ពួកគេតម្រូវឱ្យបុណ្យគ្រីស្តម៉ាសកំណត់ជាបុណ្យសាសនាដ៏តឹងរ៉ឹងមួយ ប៉ុន្តែពួកគេបែរជាឃើញប្រជាជនជាច្រើនប្រារព្ធបុណ្យនេះធ្វើជាបុណ្យមួយអធិកអធមមានការបរិភោគទទួលទានអាហារ ភេសជ្ជៈ និងការលេងល្បែងនានាដែលជាវត្ថុបម្រាមមិនបានអនុញ្ញាតិដោយព្រះជាម្ចាស់ដែលពួកគេប្រណិបត្តិនោះឡើយ។

អាកប្បកិរិយាអ្នកស្រុកនៅរដ្ឋម៉ាសាឈូសេតចាប់ផ្តើមកែប្រែបន្តិចម្តងៗ។ រហូតដល់ឆ្នាំ១៨៧០ សាលា និងជំនួញជាច្រើនត្រូវបានបើកនៅថ្ងៃបុណ្យណូអែល។ រឿងរ៉ាវក៏ត្រូវបានផ្លាស់ប្តូរបន្ទាប់ពីពេលនោះមក ហើយមិនយូរប៉ុន្មានបុណ្យគ្រីស្តម៉ាសក៏ក្លាយជាថ្ងៃឈប់សម្រាកប្រចាំឆ្នាំដ៏សំខាន់សម្រាប់មនុស្សជាច្រើន។

គ្រីស្តសាសនិកចាត់ទុកបុណ្យគ្រីស្តម៉ាសជាថ្ងៃដែលព្រះយេស៊ូទ្រង់ប្រសូត ដូចនេះមនុស្សម្នាចូលរួមក្នុងវិហារ និងនៅដល់ពាក់កណ្តាលអធ្រាត្រថ្ងៃគ្រីស្តម៉ាសអ៊ីវ (មុនគ្រីស្តម៉ាសមួយថ្ងៃ)។ ផ្អែកលើព្រះគម្ពីរព្រះយេស៊ូគ្រីស្តទ្រង់ប្រសូត្រក្នុងបរិវេណក្រោលសេះដែលព័ទ្ធជុំវិញដោយក្រោលសត្វ ដូចនេះវាមិនមានអ្វីប្លែកឡើយសម្រាប់មនុស្សជាច្រើនដែលដាក់តាំងនូវវត្ថុតាំងតូចៗនៃ



រូបសំណាកព្រះយេស៊ូ និងរបស់ផ្សេងៗទៀតដែលមានវត្តមានកាលថ្ងៃចាប់កំណើតរបស់ទ្រង់ក្នុងនោះមានសត្វគោ និងចៀមក្នុងផ្ទះរបស់ពួកគេផងដែរ។

បុណ្យគ្រីស្តម៉ាសមានអត្ថន័យទូលំទូលាយលើសពីថ្ងៃបុណ្យសាសនា។ សម្រាប់ក្មេងៗគ្រីស្តម៉ាសជាថ្ងៃដែលលោកតាសាន់តាខ្លូសមកលេងពួកគេ ហើយផ្តល់ដល់ក្មេងៗនូវកាដូដែលដាក់ពីក្រោមដើមគ្រីស្តម៉ាស។ ការអនុវត្តនូវការជូនកាដូក្នុងពេលវេលាដ៏ជាក់លាក់ប្រចាំឆ្នាំត្រូវបានរកឃើញថា អនុវត្តក្នុងវប្បធម៌ដោយឡែកៗពីគ្នាប្រៀបប្រដូចទៅនឹងការបន្សល់នូវកាដូដល់ក្មេងៗនៅពេលរាត្រីនៃថ្ងៃគ្រីស្តម៉ាសផងដែរ ។ នេះជាឧទាហរណ៍នៃការបន្សាំវប្បធម៌ដោយជាតិសាសន៍មួយ និងការវិវត្ត ដោយជាតិសាសន៍ផ្សេងទៀត។

សម្រាប់រឿងជំនួញបុណ្យគ្រីស្តម៉ាសជាពេលដែលគួរកត់សម្គាល់ខ្លាំងបំផុតនៃឆ្នាំទាំងមូល។ ត្បិតមានការជូនកាដូជាហូហែរថវិកាជាច្រើនត្រូវបានចាយទៅដល់ឈ្មួញកណ្តាល (អ្នកលក់រាយ) ជាពិសេសគឺក្នុងរដូវកាលបុណ្យគ្រីស្តម៉ាស។ នេះជាពេលដែលអ្នកជំនួញរកបានយ៉ាងកាក់កប ។ អំឡុងសម័យធ្លាក់ចុះនៃពិភពលោកឆ្នាំ១៩៣០ ខណៈដែលលុយជួបនឹងអតិផរណាធនាគារនានាបានបង្កើតឱ្យមានគណនីពិសេសមួយឱ្យឈ្មោះថា ក្លឹបគ្រីស្តម៉ាស។ រៀងរាល់សប្តាហ៍នៃឆ្នាំអតិថិជនអាចដាក់ប្រាក់កក់អតិបរមាក្នុងគណនីដាច់ដោយឡែក ហើយបន្ទាប់មកគឺនៅមុនថ្ងៃគ្រីស្តម៉ាសប្រាក់នឹងវេរទៅឱ្យអតិថិជននៅចំថ្ងៃគ្រីស្តម៉ាសយកទៅចាយវាយក្នុងហាងផ្សេងៗ។

យ៉ាងណាមិញបុណ្យគ្រីស្តម៉ាសមិនមែនមានតែអំពីសាសនា ឬការទិញទំនិញតែវាជាវេលាសម្រាប់ក្រុមគ្រួសារចំណាយពេលជាមួយគ្នា ឬយ៉ាងហោចណាស់ជាពេលដែលពួកគេផ្ញើកាតជូនពរដល់គ្នាទៅវិញទៅមក។ ម្យ៉ាងទៀត វាក៏ជាពេលដែលប្រជាជនក្លាយជាមនុស្សសប្បុរសបំផុតទៅដល់អ្នកទាំងឡាយណាដែលត្រូវការជំនួយ៕

Continued from Page 01

## Christmas in...

Why were the early English residents opposed to Christmas? They wanted Christmas to be a strict religious day but saw that many people treated it as a celebration that involved too much eating, drinking and game playing which were all things God disapproved of, they believed.

Attitudes in Massachusetts were slow to change. Until the 1870s, most schools and businesses were open on Christmas day.

Things changed after that and Christmas soon became the most important holiday of the year for many people.

Christians recognize Christmas as the day Jesus was born so many attend church services, often at midnight on Christmas Eve. According to the bible, Jesus was born in a stable surrounded by farm animals, so it is common for people to have a display of small figures of Jesus and others who were present at his birth (including cows and sheep) in their homes.

Christmas is much more than a religious holiday. For children, it is the day that Santa Claus visits and leaves behind presents that are placed underneath the Christmas tree. The practice of giving gifts at a certain time of the year is found in many cultures as are stories of mysterious figures who appear in the night and leave gifts for children. These are examples of how practices that are common in one culture often are adopted and changed by others.

For businesses, Christmas is a critical time of the year. With so many gifts being given, much money is spent so retailers especially depend on the Christmas season to make profits. During the Great Depression of the 1930s when money was very scarce, banks set up special accounts they called Christmas Clubs. Each week during the year, customers would deposit a small amount of money in a separate account, then just before Christmas the money would be paid back to the customer , just in time to spent it in the stores.

But Christmas is not only about religion or shopping, it is a time for family and friends to spend time together or at least to send each other colorful Christmas cards. It is also a time when people are at their most generous with donations to those in need.

តមកពីទំព័រទី ៤

## ផ្តួចផ្តើមប្រព័ន្ធភ្ជាប់ទំនាក់ទំនងក្នុងសហគមន៍...

អត្ថាធិប្បាយក្នុងព្រឹត្តិការណ៍ ក៏ដូចជានាយកនៃអិល ធី ស៊ី បានកត់សម្គាល់ថា កម្មវិធីវីដេអូដែលត្រូវបានទទួលការពេញនិយមលេខមួយគឺកម្មវិធីបញ្ចាំងអំពីក្រុមរបាំអង្គរដែលបង្ហាញពីរបាំអប្សរា។



Richard Howe



Soben Pin discusses KhmerPostUSA

ពាក់កណ្តាលទៀតនៃកម្មវិធីនេះបានប្តូរទៅជាកិច្ចការពិភាក្សាទៅលើឥទ្ធិពល និងយុទ្ធសាស្ត្រ។ បេក្ខជនក្រុមប្រឹក្សាក្រុងលោក ឌីរ៉េក មីតឆែល និង ដែននី រូគី ពិភាក្សាទៅលើការដែលពួកគាត់ប្រើប្រាស់ប្រព័ន្ធផ្សព្វផ្សាយក្នុងយុទ្ធនាការបោះឆ្នោត។ យ៉ាងណាមិញអ្នកទាំងពីរបានថ្លែងថា ប្រពន្ធផ្សព្វផ្សាយបែបបច្ចេកវិទ្យាជាមធ្យោបាយមានប្រសិទ្ធភាពក្នុងលក្ខខណ្ឌមួយចំនួនតែមិនបានជំនួសតួនាទីផ្សព្វផ្សាយតាមបែបប្រពៃណីដូចជាការទៅទាក់ទងដោយផ្ទាល់ជាមួយអ្នកបោះឆ្នោត។

សម្រាប់ម៉ោងចុងក្រោយនៃសន្និសីទគឺជាវេទិកាសម្រាប់អ្នកចូលរួមក្នុងការចូលរួមកិច្ចសន្ទនាពីការភ្ជាប់ខ្លួនទៅនឹងសហគមន៍។ អតីតនាយកសាលា និងជាបេក្ខជនជាប់ឆ្នោតក្នុងក្រុមប្រឹក្សាក្រុងលោក វីលា មសាម៉ារ៉ាស បានមានប្រសាសន៍ថា ចំណុចសំខាន់ក្នុងការប្រាស្រ័យទាក់ទងជាមួយប្រជាជន គឺការទៅដោយផ្ទាល់ដល់ទីកន្លែងដែលគេតាំងនៅតាមរយៈការទៅឱ្យដល់ភូមិដ្ឋានតំបន់ដែលគេរស់នៅ និងការបង្កើតឱ្យមានជាសកម្មភាពសហគមន៍។ អ្នកស្រី សុបិន្ត ពិន ជាសហនាយកគ្រប់គ្រងនៃកាសែតខ្មែរផុស សហរដ្ឋអាមេរិកបានថ្លែងនាឱកាសនោះស្តីពីការប្រើប្រាស់សារព័ត៌មាន និងកាសែតដើម្បីភ្ជាប់ទំនាក់ទំនង ជាមួយសហគមន៍ខ្មែរដែលនៅឡូវែល និងតំបន់ដទៃទៀត។

អ្នករៀបចំសន្និសីទបានចាត់ទុករាល់កិច្ចសំណេះសំណាលពិភាក្សាថាបានជោគជ័យ និងបានស្នើដល់អ្នកចូលរួមបន្តការគាំទ្រ និងមានវត្តមាននៅឆ្នាំបន្ទាប់សំដៅបន្តប្រើប្រាស់ប្រព័ន្ធផ្សព្វផ្សាយជាមាតិកាក្នុងការបន្តចរន្តទំនាក់ទំនងសង្គមឱ្យកាន់តែប្រសើរ និងខ្លាំងក្លាឡើងក្នុងតំបន់ឡូវែល។

សារព័ត៌មានខ្មែរផុសចូលរួមលើកតម្លៃស្មារតីនៃអង្គសន្និសីទ។ ឥឡូវនេះលោកអ្នកអាចតាមដានអំពីយើងខ្ញុំតាមរយៈ ធ្វីតធី @khmerpostUSA និងតាមរយៈគេហទំព័រហ្វេសប៊ុក KhmerPostUSA ៕

Continued from Page 04

## Fostering a Socially Connected...

professionally. A second group featuring Danielle McFadden, Caroline Gallagher, Phil Lupsievicz, and Jessica Wilson discussed the power of web-based video. Wilson, who hosted the event as the executive director of LTC noted that the #1 most-viewed video on LTC's youtube channel is Angkor Dance Troupe's presentation of Apsara Dancing Stones.

The second half of the program shifted from the technical side to the discussion of impact and strategies. Lowell city council candidates Derek Mitchell and Danny Rourke talked about how they used social media in their campaigns. Both candidates said that social media was an effective tool in some aspects but not enough to replace traditional media and direct voter contact.

For the event's final hour, all attendees were invited to participate in a conversation about community engagement. Former Lowell High School Headmaster and Lowell City Councilor-Elect, William "Bill" Samaras spoke during this segment about the importance of reaching people "where they are" by going into their neighborhoods and existing social networks. Soben Pin, managing partner of the KhmerPost, spoke during this portion about how the newspaper uses that approach in connecting with the Cambodian community in Lowell and beyond.

Conference organizers considered the session very successful and asked participants to continue to remain involved in using social media and other methods to strengthen the sense of community in Lowell. KhmerPost is also engaging in this community discussion. You can now follow KhmerPostUSA on Twitter at @KhmerPostUSA and like KhmerPost USA on facebook.

## តមកពីទំព័រទី/០៣ ចងចាំណែលសិន ម៉ាឌីកា ម៉ាន់ដេឡា...

ផាទ្រី មឺហ្វី (Mayor Patrick Murphy) ទីប្រឹក្សា ក្រុងរីតា មឺស៊្បី (Rita Mercier) មន្ត្រីចុះបញ្ជី រីឆាដ ហូវ (Richard



Howe) ប្រធានគណៈកម្មការសាលាសាធារណៈឡូវែល (Chair of LCCPS Trustees Hung Mai and Trustee Fru Nkimbeng) នាយកសមាគមវប្បធម៌អាហ្វ្រិក លីវេណា ហ្វូរ៉ូសា (A.C.A President Levenia Furusa) ក្រុមសិល្បៈស៊ីងហ្គូនៃប្រទេសកាមេរូន (Singo Dance Group from Cameroon) ក្រុមភ្លេងកុមារនៃសាលាសាធារណៈឆាធីឡូវែល (Drumming and Percussion of LCCPS) ក្រុមចម្រៀង និងស្គរ អូស៊ីប៊ី នៃប្រទេសហ្គាណា (Osibi Drumming & Singing Group of Lowell of Ghana) ព្រមទាំងភ្ញៀវជាច្រើនទៀត។



ជាមួយគ្នាតំណាងរាស្ត្រ អៃលីន ដូណាហ៊្យូ (Senator Eilene Donoghue) បានមានប្រសាសន៍ថា គុណសម្បត្តិរបស់ម៉ាន់ដេឡា តស៊ូប្រឆាំងការរើសអើងជឿជាក់លើភាពត្រឹមត្រូវយុត្តិធម៌ និងគុណតម្លៃនៃទឹកចិត្តអភ័យទោស ចំពោះអ្នកដែលដកសេរីភាពរបស់លោកពីជីវិតផ្ទាល់ខ្លួនក្រុមគ្រួសារ។ សេចក្ដីល្អទាំងអស់នេះត្រូវបានចងចាំ ហើយយើងយកវាមកអនុវត្តក្នុងសហគមន៍របស់យើង។ យើងទាំងអស់គ្នាជាសរសៃឈាមនៃឡូវែល ហើយឡូវែលជាសហគមន៍ចម្រុះជាតិសាសន៍



និងជនអន្តោប្រវេសន៍ដែលមកពីទីកន្លែងផ្សេងគ្នាក្នុងពិភពលោក ។ ដូចនេះជំហលុបបំបាត់ការរើសអើង និងការគាំទ្រយុត្តិធម៌មានសារសំខាន់ណាស់។

រីឯអភិបាលក្រុងផាទ្រីក មឺហ្វី បានថ្លែងសរសើរអំពីការលះបង់ និងស្នាដៃរបស់ម៉ាន់ដេឡា ចំពោះមនុស្សជាតិ។

កម្មវិធីខាងលើប្រព្រឹត្តទៅយ៉ាងជោគជ័យ និងមានការចូលរួមយ៉ាងសកម្មពីមនុស្សគ្រប់គ្នាក្នុងកម្មវិធី៕

## តមកពីទំព័រទី/១៣ លោក សម រង្ស៊ី...

ជាប្រធានក្រុមការងារបក្សប្រចាំខេត្តនេះ បានសម្ដែងការយល់ស្របថា ការលើកឡើងរបស់លោក សម រង្ស៊ី គឺធ្វើឡើងក្នុងបំណងអំពាវនាវឱ្យលោក ហ៊ុន សែន យកគំរូតាមអ្នកស្រី យីង ឡាក់ ប៉ុណ្ណោះ។ អ្នកស្រីមានប្រសាសន៍ថា "វាមិនមែនជាការប្រមាថទេ។ គាត់ចង់ប្រៀបធៀបលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ជាមួយនាយករដ្ឋមន្ត្រី យីងឡាក់ ស៊ីណាវ៉ាត្រា ពាក់ព័ន្ធនឹងភាពក្លាហាន"។

លោក សម រង្ស៊ី ក៏បានលើកឡើងផងដែរថា សម្ដីរបស់លោកត្រូវបានគេយកទៅបកស្រាយខុសបរិបទ និងថា លោកមានបំណងបង្ហាញក្ដីគោរពចំពោះអ្នកស្រី យីងឡាក់ មិនមែនចង់បន្ទុះបង្អាប់ស្ត្រីភេទទេ។ លោកមានប្រសាសន៍ថា "ការមានស្ត្រីជានាយករដ្ឋមន្ត្រី គឺជារឿងកម្រខ្លាំងណាស់នៅក្នុងលោកនេះ។ អ្វីដែលខ្ញុំចង់និយាយគឺថា យើងគោរពអ្នកស្រី យីងឡាក់ ស៊ីណាវ៉ាត្រា ដោយសារភាពក្លាហាន និងភាពថ្លៃថ្នូររបស់គាត់។ ទោះបីជាគាត់គ្មានហេតុផលផ្លូវច្បាប់ក្នុងការចុះចេញពីតំណែងដោយសារគាត់ជានាយករដ្ឋមន្ត្រីស្របច្បាប់ដែលបានជាប់ឆ្នោតតាមលក្ខណៈប្រជាធិបតេយ្យ ហើយការប្រឆាំងគាត់មានតិចក៏ដោយក៏គាត់នៅតែដកខ្លួន។ គាត់គឺជាស្ត្រីម្នាក់ឱ្យ តែលោក ហ៊ុន សែន បែរជាមិនក្លាហានដូចគាត់"៕ **សេរីវុធ**

# ពិធីជប់លៀងប្រចាំឆ្នាំរបស់ក្រុងខ្មែរ Cambodia Town Banquet



ដោយ : សុខា

**ក្រុងឡូវែល :** ថ្ងៃទី១៤ ធ្នូ ឆ្នាំ ២០១៣ នៅភោជនីយដ្ឋានរាត្រីហុងកុងក្រុងខ្មែរដែលមានលោកបណ្ឌិតសេងលីគង់ជាប្រធានបានធ្វើបង្កើតកម្មវិធីជប់លៀងមួយក្នុងគោលបំណងបង្ហាញសិទ្ធផលដែលបំពេញកន្លងមក និងគម្រោងដែលមានបន្ត។

ទាក់ទិននឹងសមិទ្ធផលកន្លងមកលោក បណ្ឌិត គង់ សេងលី បានមានប្រសាសន៍ថា ស្នាដៃទាំងអស់នោះមានជាអាទិ៍ដូចជាការបង្កើតគោលនយោបាយក្រុងខ្មែរសម្រេចបានដោយក្រុមប្រឹក្សាក្រុងខ្មែរសហការជាមួយសាលាក្រុងអនុម័តទូវគម្រោង និងថវិកាដាក់បដារូបសញ្ញាក្រុងខ្មែរនៅលើស្ពានច្រកចូលក្រុងខ្មែរការដាក់បង់អង្គុយនៅតាមទីសំខាន់ៗ

តទៅទំព័រទី ២២

On December 14th, the Cambodia Town Committee of Lowell hosted their first annual banquet. Throughout the evening event at Hong Kong Restaurant, Committee members looked back at past achievements and presented new upcoming initiatives the group is looking to accomplish.



The Cambodia Town Development Organization is dedicated to advancing a communal vision of economically, socially, culturally, politically vibrant and prosperous Cambodia Town. Since 2011, the organization has worked with the City of Lowell Planning Department on various improvements to the neighborhood. Four Cambodia Town banners have been mounted on the Middlesex Bridge, 10 public benches, and four trash receptacles have been installed in the area following a public input process. There are plans to install 16 additional banners and a large Cambodia Town sign in the coming months. The Cambodia Town Committee has also hosted Cambodian New Year celebrations at Clemente Park for the past two years, drawing crowds of over 3,000 to the event.

Dr. Sengly Kong, the chair of the Committee noted the all-volunteer organization needs the help and support of the community to achieve their goals. "Unfortunately, we can't make a wish list to put under a Christmas tree so Santa Claus can make it come true. No, it doesn't work that way. We have to work together to make it come true…If each of us can do little bit toward our goals, together, we can accomplish a lot."

# ឋានសួគ៌នៃឆ្នេរ សមុទ្រខ្មែរកោះរុង










កោះរុងជាកោះដែនសមុទ្រកម្ពុជាដែលត្រូវប្រើប្រាស់ពេលវេលាប្រមាណ៣០នាទីដោយកាណូតល្បឿនលឿន ដើម្បីឆ្ពោះទៅកម្សាន្តក្នុងតំបន់នោះ។ បច្ចុប្បន្នរដ្ឋាភិបាលខ្មែរកំពុងប្រកាសផ្សព្វផ្សាយការដេញថ្លៃសាងសង់រៀបចំលើប្លង់ប្រមាណជាង១៣កន្លែងគួរឱ្យកត់សម្គាល់។ សក្តានុពលទេសចរឆ្នេរសមុទ្រកោះរុងជាឆ្នេរស្រស់ស្អាតបំផុតនៅឥណ្ឌូចិន។ ដូច្នេះប្រជាជនកម្ពុជា គួរតែឆ្លៀតឱកាសទៅទស្សនាទឹកដីដូនតាដ៏ស្រស់ស្អាតមួយនេះ ដើម្បីជួយអភិវឌ្ឍន៍ និងលើកកម្ពស់ជីវភាពប្រជាពលរដ្ឋក្នុងសហគមឱ្យកាន់តែមានកម្រិតធូរធារបន្ថែមទៀត។ កោះរុង ជាកោះមួយស្ថិតនៅចម្ងាយ២៥គីឡូម៉ែតពីឆ្នេរសមុទ្រខេត្តព្រះសីហនុនៃព្រះរាជាណាចក្រកម្ពុជា។ តំបន់នេះមានផ្ទៃដី៧៨ គមការ៉េ និងមានប្រវែងខាងជើងទៅខាងត្បូងប្រហែល១០គ.ម។ ចំណុចខ្ពស់បំផុតរបស់កោះមានកម្ពស់១៣៣មពីនីវូទឹកសមុទ្រ។ ថ្មីៗនេះមានក្រុមហ៊ុនក្នុង និងក្រៅប្រទេសមួយចំនួនមានគម្រោងអភិវឌ្ឍរួមដើម្បីផ្លាស់ប្តូរមុខមាត់កោះនេះ ឱ្យទៅជាទីរមណីដ្ឋាន និងរីសតដ៏ល្អប្រណីតទៀតផង។ កោះនេះទៅថ្ងៃអនាគតនឹងត្រូវបានអភិវឌ្ឍន៍ក្នុងរយៈពេលលើសពី២០ឆ្នាំ។ គេឃើញមានផ្កាថ្មដុះនៅជុំវិញកោះរុង និងកោះផ្សេងៗទៀតនៃតំបន់នេះផងដែរ។ គួរបញ្ជាក់



ថា កោះរុងគឺជាឋានសួគ៌ លើទឹកធម្មជាតិនៃសមុទ្រទឹកខៀវស្រងាត់ដ៏ស្រស់ស្អាតអស្ចារ្យ។ កោះនេះត្រូវបានដឹងថា ជាកោះស្អាតជាងគេក្នុងបណ្តាលកោះទាំងអស់នៅកំពង់សោម ប្រសិនបើធ្វើដំណើរតាមទូកធំ និងប្រើប្រាស់ពេលវេលាប្រហែលជាពីរឬទៅបីម៉ោង៕







( តមកពីទំព័រទី ០១)

# ដំណើរតាមជើងសមុទ្រ...



**ដោយ : ពិន សំខុន**

ជើងដំណើរដ៏វែងមួយមិនដែលធ្លាប់ធ្វើពីមុនមកធ្លាប់ឃើញតែភាពអស្ចារ្យរបស់វាតែ តាមខ្សែភាពយន្ត ឬតាមទូរទស្សន៍នោះ កាលពីថ្ងៃអាទិត្យ ទី១៥ធ្នូ ចុងឆ្នាំ២០១៣ យើងបានឡើងមហានាវាទេសចរ Cruiser ឈ្មោះ Norvegian cruiserline, ហៅ "គ្រូស៍" ចេញដំណើរពី "ញូយ៉ក" ទៅកាន់ "បាហា ម៉ាស" ហើយត្រឡប់មកដល់ញូយ៉កវិញ នៅថ្ងៃអាទិត្យទី២២ ធ្នូ ១សប្តាហ៍បន្ទាប់មក ។

នៅពេលដែលព្យុះទឹកកកព្រិលធ្លាក់យ៉ាងក្រាស់ក្រែលទៅតំបន់ញូអ៊ិនក្លិនគ្រួសារយើង សុបិន ប៊ុណ្ណារ៉ូ នឹងខ្ញុំបានចាកចេញពីឡូវែលតាំងពីព្រលឹមធ្វើដំណើរយ៉ាងតិច៥ម៉ោង ដើម្បីឱ្យទាន់ជើងកុប៉ាល់ដែលត្រូវចេញដំណើរចេញពីញូយ៉កនៅម៉ោងពារសៀល ។ ស្រូតរូតមកទាន់ពេលល្មមតែរំភើបចិត្តនឹងភ្ញាក់ផ្អើលដំបូងបង្អស់អំពីទំហំដ៏ធំមហិមានៃកុប៉ាល់ "ន័រវេស៊ីយាន" ដ៏ថ្មីស្រឡាងចេញប្រើដំបូងឆ្នាំ២០១៣កំពស់៤០ម៉ែត្របណ្តោយ៣២៥ម៉ែត្ររៀបជាបន្ទប់១៨ជាន់ ។ ភ្ញៀវជាង៤ពាន់នាក់ប្រជ្រៀតគ្នាក្នុងសណ្តាប់ធ្នាប់ធ្វើ "ផែក អ៊ិន" ឆ្លងប្រព័ន្ធសន្តិសុខដូចដែលធ្លាប់ឃើញនៅព្រលានយន្តហោះ ឆ្លងក្រសួងតយ នឹងឆ្លងក្រុមបដិសណ្ឋារកិច្ចដែលពីក្រោមដល់លើមានបុគ្គលិកជាង១៥០០នាក់ ចាំទទួលដំណើរយើងមិនឱ្យខ្វះត្រង់ណាឡើយ ដែលចាប់ពីពេលនេះតទៅយើងទាំងបីនាក់



ផ្តើម សុបិន ទាំង ភ្អែកស្រស់បាន ថា "ពួកយើងជាគ្រួសារអភិជនដ៏សំខាន់មួយនឹងគេដែរ ក្នុងរយៈពេល១សប្តាហ៍ទៅមុខទៀតនេះ" ។

លោកអ្នកអានដែលតាមដានបទពិសោធន៍នឹងទស្សនៈថ្មីជាមួយដំណើរយើងខ្ញុំពេលនេះឆ្ងល់ទេថា "ហេតុអ្វីក៏យើងក្លាយជាអភិជនបានភ្លាម បើគ្រាន់តែយើងជាន់ជណ្តើរឡើងកុប៉ាល់ "ន័រវេស៊ីយាន" ភ្លាមនោះ? បុគ្គលិកប្រកបដោយឯកសណ្ឋានឥស្សរយសតម្រៀបជាជួរទទួលភ្ញៀវក្នុងសាលទទួលភ្ញៀវធំទូលាយលំអរដោយពន្លឺនឹងក្បាច់ក្បូរសម័យដ៏គួរឱ្យរំភើបរំជួលចិត្តសម្រាប់គ្រប់វ័យ ។ គេបានផ្តល់កម្មវិធីប្រចាំថ្ងៃទីកន្លែងកំសាន្តក្នុងប្រាសាទសមុទ្រទីកន្លែងដែលចុះកំសាន្តនៅដីគោកទីកន្លែងដែលទទួលភ្ញៀវពិសារភោជនាហារដែលគ្រប់នាទី វានឹងធ្វើឱ្យយើងភ្លេចខ្លួនថា "យើងគ្រាន់តែជាមនុស្សធម្មតាម្នាក់មកកំសាន្តនៅតាមកម្មវិធីកុប៉ាល់ន័រវេស៊ីយាន "តែប៉ុណ្ណោះសោះ" ។ យើងបានត្រូវបុគ្គលិកគ្រូស៍នាំមកកាប៊ីន ឬបន្ទប់លេខ១២៧៧២នៃជាន់ទី១២មានបាលកូនីសម្រាប់អង្គុយមើលសមុទ្រនាំទាំងវ៉ាលីសបីមកឱ្យមិនចាំបាច់យួរមកបន្ទប់ដោយខ្លួនឯងផង ។ គឺជាបន្ទប់តូចច្រឡឹងរចនាដោយគ្មានកន្លែងណាមួយដែលឥតប្រយោជន៍មានគ្រែធំទូលាយមានសាឡុងទទួលភ្ញៀវមានបន្ទប់ទឹកដែលអ្នកសំអាតចូលមករៀបបន្ទប់ឱ្យស្អាតភ្លឹងពេលយើងចេញក្រៅម្តងៗ ។ នារសៀលនឹងរាត្រីទី១នេះយើងបានដើរកំសាន្តពិនិត្យភូមិសាស្ត្រក្នុងមហានាវាដែលរឹតតែគួរឱ្យចាប់ចិត្តថែមទៀត ។ បន្ថែមលើហាងម្ហូបអាហារដ៏មានឈ្មោះល្បីៗក្នុងពិភពលោកមានឆាកសំដែងសំរាប់សិល្បករជាច្រើនកន្លែងមានកន្លែងសំអាងរូបរាងកាយនៅច្រើនជាន់រួមទាំងមានគ្រូពេទ្យសំរាប់ណែនាំពីការថែរសម្ផស្សស្ត្រីបុរសទៀតផង កន្លែងទទួលមើលកុមារ ឬក្មេងៗកន្លែងកំសាន្តកីឡាលេងទឹក សួនកុមារ កាស៊ីណូ... ហាក់ដូចជាអ្វីៗបង្កើតឡើងសម្រាប់ក្តីស្រម័យរបស់មនុស្សធម្មតាជប់ឱ្យព្រលឹងនៃអ្នកសម្បូរបែបម្នាក់ៗឱ្យរស់រវើកយ៉ាងរីករាយនឹងគ្មានទោសពៃរ៍អ្វីដោយសារតែការបំពេញបំណងខ្លួនឯងនឹងក្រុមគ្រួសារខ្លួននោះឡើយ ។

រីករាយនឹងបានឃើញការរៀបចំទាំងឡាយ ដើម្បីបំពេញចិត្តភ្ញៀវគ្រប់គ្នាដោយមិនប្រកាន់វណ្ណៈល្អាចនេះ យើងបានចូលទៅបរិភោគនៅភោជនីយដ្ឋានមួយទល់មុខរោងភាពយន្តដែលបញ្ចាំងកីឡា "បាល់ឱប" មានអ្នកមើលស្រែកហ៊ោកញ្ជៀវយ៉ាងរីករាយរួចហើយយកប៊ុណ្ណារ៉ូទៅផ្ញើឱ្យគេមើលឱ្យរហូតដល់ម៉ោង១០យប់ ដើម្បីមានឱកាសទៅស្តាប់ភ្លេង ឬមើលល្ខោនអ្វីផ្សេងៗ ។ យប់បន្តិចហើយខ្ញុំនាំសុបិនទៅស្តាប់តន្ត្រី jazz ប្រគុំដោយពួកស្បែកខ្មៅ FatCat យើងមានការចាប់អារម្មណ៍ចម្លែកពីរោះនឹងបទជាច្រើនដែលច្រៀងឥតព្រៀងទុកកំដរភ្ញៀវយ៉ាងជក់ចិត្តធ្វើឱ្យយើងនឹកទៅដល់សិល្បករចម្រៀងចាប៉ីខ្មែរម្នាក់ឈ្មោះ "ចង្ក្រមជ" ដែលបានមកសម្តែងនៅញូយ៉កកំដរដោយក្រុមដន្ត្រី "គីតារ" អាមេរិកាំង កាលពីរដូវក្តៅមុននេះ ទំនងជាពីរោះគួរឱ្យចាប់ចិត្តដូចគ្នា ។

**នៅមានត**

តមកពីទំព័រទី ១

# សូមស្វាគមន៍ឆ្នាំ២០១៤

មួយជាព័ត៌មានដែលតែងតែអះអាងភាពពិតរបស់វាដោយភស្តុតាង ឬមានអ្នកទទួលខុសត្រូវឯមួយទៀត ជាមតិយោបល់ដែលទាំងយើងខ្ញុំ



ខ្មែរផុសស.រ.អាទទួលលិខិតសរសើរពីសាលាក្រុង

City manager Bernie Lynch មកការិយាល័យខ្មែរផុសស.រ.អា

ឬលោកអ្នកអានអាចនឹងសរសេរលើទំព័រមតិយោបល់ខ្មែរផុសបានដោយសេរី (មកទល់ពេលនេះ លោកអ្នកអានពុំសូវប្រើសិទ្ធិនេះនៅឡើយទេ) ។ នៅឆ្នាំ២០១៣នេះ យើងបានតម្លើងទំព័រកាសែតពី២០



ទីប្រឹក្សាក្រុង រីតា មីឡឺ មកការិយាល័យខ្មែរផុសស.រ

ទំព័រមក៣២ទំព័រ និងអត្ថបទជាភាសាខ្មែរ-អង់គ្លេសបាន៤០% ។

**២-ក្នុងតួនាទីជាអ្នកផ្សព្វផ្សាយពាណិជ្ជកម្ម :** ការខិតខំប្រឹងប្រែងសំរាំងគុណភាពកាសែត គឺមានគោលដៅឱ្យអ្នកអានចូលចិត្តអានខ្មែរផុសឱ្យបានច្រើន ដូច្នេះនឹងមានពាណិជ្ជករកាន់តែច្រើនចង់ចូលមកទិញទំព័រផ្សាយពាណិជ្ជកម្មពីផលិតផលរបស់ខ្លួនដែរ ។ ដូច្នេះតួនាទីទី២នេះជាចំណីអាហារនឹងជាដង្ហើមចេញចូលសម្រាប់រស់របស់កាសែតយើង ម្ល៉ោះហើយ ដើម្បីជៀសវាងទំនាស់ ឬសំពាធដល់ការសរសេរព័ត៌មានរចនាសម្ព័ន្ធខ្មែរផុសបានដាក់ក្រុមពាណិជ្ជកម្ម និងក្រុមអ្នកសរសេរព័ត៌មានឱ្យដាច់ពីគ្នា ។ ដើម្បីរស់ខ្មែរផុសនៅតែរក្សាជំហ៊រសីលធម៌ខ្ពស់មិនព្រមលក់ទំព័រដល់ពាណិជ្ជកម្មណាដែលបណ្តាលឱ្យមានការគ្រោះថ្នាក់ដល់អ្នកអាននោះទេ ផ្ទុយទៅវិញចំពោះផលិតផលស្របច្បាប់ល្អៗទាំងឡាយខ្មែរផុសបានក្លាយជាម៉ាស៊ីនផ្សព្វផ្សាយដ៏មានប្រសិទ្ធភាព ចំពោះអតិថិជនរបស់ខ្លួន ដោយជួបគ្រោងគំរូសម្រាប់ផ្សាយជួយភ្ជាប់ពាណិជ្ជកម្មដែលខ្លួនផ្សាយទៅនឹងសាធារណជនក្នុងតំបន់ដ៏ទូលំទូលាយជួយភ្ជាប់ទំនាក់ទំនងទៅនឹងអ្នកឯកទេសពាណិជ្ជកម្ម ដែលអាចនាំឱ្យមានគំនិតថ្មីៗ ដើម្បីអភិវឌ្ឍន៍ការងារលោកអ្នកបាន...។ល។ ឆ្នាំ២០១៣ នេះខ្មែរផុសស.រ.អាបានបំពេញតួនាទីទី២នេះបានប្រសើរជាងឆ្នាំមុនៗ ។ ដោយតម្លើងទំហំពាណិជ្ជកម្មបានប្រមាណ៣០% ។

**៣-ក្នុងតួនាទីជាពាណិជ្ជករខ្នាតតូច :**

ការរកស៊ីតម្រូវឱ្យសម្រួលទំនាក់ទំនងរវាងអ្នកលក់ និងអ្នកទិញ យើងបានបើកទីស្នាក់ការ-បច្ចេកទេសនៅកណ្តាលក្រុងក្នុងទំហំតូចមួយ ហើយតម្លើងបុគ្គលិកបានបីនាក់ នាឆ្នាំ២០១៣នេះ ។ ពីទីនោះយើងបានភ្ជាប់ទំនាក់ទំនងពាណិជ្ជកម្មជាមួយអគារពាណិជ្ជកម្មទំនាក់ទំនងជាមួយសាលាក្រុង និងក្រុមអភិវឌ្ឍន៍ពាណិជ្ជកម្មក្នុងតំបន់ច្រើនផ្នែក ដើម្បីឱ្យគេដឹងថា ខ្មែរយើងមានពាណិជ្ជកម្មជាអ្នកផ្សព្វផ្សាយមួយដែរនៅទីនេះ ហើយគេផ្សព្វផ្សាយព័ត៌មានឱ្យខ្មែរយើងដឹងពីធនធានដែលមានសម្រាប់ជួយប្រជាជនទាំងមូល ដូចជាធនាគារ ម្ហូបអាហារ-ចែកធុងវេបសាយខល -មានពិធីក្នុងក្រុងសម្រាប់សហគមន៍ ឬសម្រាប់កុមារជាដើម ។ យើងបានធ្វើការចែកចាយកាសែតដោយមិនយកថ្លៃស្ទើរគ្រប់ហាង ឬការិយាល័យដែលមានខ្មែរចេញចូលនេះក៏ជាជំនួយខ្លះដែរ ដល់ហាងខ្មែរដែលនៅពេលគេជក់អាន ហើយមកយកកាសែតទៅអានហើយទិញតវ៉ាន់ក្នុងហាងនោះតែម្តង ។ ឆ្នាំនេះយើងបានធ្វើការចែកចាយកាសែតនៅឡូវែល-លីន-រីវេ-រ៉ូដ អាឡិន-កុណិទីកិត-ញូជឺស៊ី-ហ្វីឡាដែលហ្វៀ ដែលរៀងរាល់ខ្មែរយើងបោះពុម្ពចំនួនពី១ម៉ឺនទៅ១៥.០០០ម៉ឺនច្បាប់ ។

**៤-តួនាទីជាជំនួយសហគមន៍ :**

យើងបានបង្កើតអត្ថបទខ្មែរ-អង់គ្លេសចំនួន៩ឆ្នាំមកហើយ ក្នុងបំណងឱ្យគ្រួសារខ្មែរដែលម្នាក់ចេះតែខ្មែរ ម្នាក់ទៀតចេះតែអង់ គ្លេសឱ្យអាចយល់រឿងសង្គមរួមគ្នាបាន ហើយអាចពិគ្រោះគ្នាបានថែមទៀត ។ ឥឡូវនេះអត្ថបទខ្មែរ-អង់គ្លេស បានបង្កើនអត្ថន័យមួយទៀត គឺសហគមន៍អាមេរិកាំងដែលគេចង់យល់ពីខ្មែរដែលជាទូទៅទំនាក់ទំនងនោះមានលក្ខណៈចង្អៀតចង្អល់ ។ រីឯតួនាទីសង្គមដោយចំពោះនោះ យើងពុំមានអ្វីទេ ក្រៅពីផ្តល់ឧបករណ៍ ឬទស្សនៈ ឬព័ត៌មានដែលឆ្លុះបញ្ចាំងពីអំពើត្រូវនឹងខុសបង្ហាញពីការគ្រោងសំរាប់អនាគតពន្យល់ពីអ្វីដែលត្រូវដឹងសម្រាប់ប្រើក្នុងជីវិតមិនញុះញង់ឱ្យឈ្លោះគ្នាបង្កើនចំណេះជូនអ្នកអាន...។ល។ ក្រៅពីបង្ហាញពីទស្សនៈត្រូវខុសនៅមានទស្សនៈ "ខ្វែងយោបល់គ្នា" តែជាទស្សនៈវិជ្ជមានដែលយោបល់ម្នាក់ៗសុទ្ធតែមានប្រយោជន៍សំរាប់អ្នកដ៏ទៃ បើមិនទាំងអស់ក៏មានអ្នកយល់ស្របខ្លះដែរ រីឯទស្សនៈដែលថ្មី ឬខុសគេស្រឡះក៏មិនច្បាស់ជាខុសនោះទេ... ដូច្នេះការទទួលស្គាល់នូវទស្សនៈអ្នកដ៏ទៃដោយមិនប្រកាន់ខឹងជាលក្ខណៈសម្បត្តិដ៏ប្រពៃដែលខ្មែរផុសតែងតែទទួលយកមកផ្សព្វផ្សាយជូនបានដោយគ្មានចង្អៀតចង្អល់ ។

ក្នុងតួនាទីទាំងអស់នោះ អាចបង្រួមសេចក្តីមកថា ជា "អ្នកនាំសារ" តែមួយម៉ាត់ប៉ុណ្ណោះ ក៏ប៉ុន្តែបើយើងមើលប្រវត្តិនៃអ្នកនាំសារនៅស.រ.អា ឬនៅអឺរ៉ុបអ្នកនាំសាររបស់គេមានតម្លៃថ្លៃថ្លាណាស់ ដោយសារអ្នកទាំងនោះ ដូចគ្នានឹងអ្នកបួសគេគោរពវិន័យក្រិត្យក្រមសីលធម៌នឹងក្បួនផ្សព្វផ្សាយយ៉ាងខ្ជាប់ខ្ជួន ហើយម្យ៉ាងទៀតសាសន៍គេមានទម្លាប់ចេះកោតសរសើរគ្នាពេលណានរណាម្នាក់បានធ្វើអំពើប្រពៃណាមួយ ហេតុដូច្នេះហើយពីមួយជំនាន់ទៅមួយជំនាន់ទៀត មនុស្សប្រពៃរបស់គេតែងតែលេចធ្លោរជាបន្តបន្ទាប់រាប់មិនអស់ ។ ខ្មែរផុសស.រ.អាបានបញ្ចេញឈ្មោះអ្នកសរសេរមួយចំនួន ដូចជា លោកតាម៉ម យីន, លោក គឹម ភៀន,អ៊ុំ ឈឿម,លិនស៊ុដរីង, លោក កិម សុស, តែដោយរវល់ខ្លះក៏សម្រាកតូចមួយរយៈសង្ឃឹមថា និងធូរស្បើយ ហើយត្រឡប់មកបន្តការងារនៅឆាប់ៗនេះ តែមានសមាជិកអ្នកសរសេរថ្មីៗដែលទឹកដៃក៏មិនចាញ់អ្នកមុន ដូចជា ឌីក ហាវ នាង លិម សុខា និងជេម អស៊ីស ។ ក្រុមខាងក្រោយនេះនៅឡូវែលជាទីដែលយើងទើបនឹងប្តូរទីតាំងស្នាក់ការថ្មី

តទៅទំព័រទី ២២



ខ្មែរផុសស.រ.អាផ្សព្វផ្សាយក្នុងសហគមន៍ខ្មែរ និងសប្បុរសធម៌ឆ្នាំ២០១៣

## តមកពីទំព័រទី ១ វ៉ាចារលោក វ៉ាសនា នួន នាឱកាសដាច់ឆ្នាំ...

លោកនៅដើមខែ១នេះហើយ តើលោកមានទឹកចិត្តត្រៀមខ្លួនប្រឡូកជាថ្មីនៅ២ឆ្នាំខាងមុខនេះទៀតទេ ?

**វ៉ាស្នា នួន :** គិតពេលនេះឃើញថា ឆាប់ពេកហើយ! ទោះជាខ្ញុំយល់ថា ខ្មែរយើងគួរតែមានតំណាងហោចណាស់ក៏ម្នាក់ដែរ នៅសាលាក្រុងនោះ ហើយតើខ្ញុំនឹងចូលរួមបោះឆ្នោតក្នុងប្រព័ន្ធណាមួយនៅអនាគត់ ?

**ខ្មែរផុស :** តើលោកចង់និយាយពីប្រព័ន្ធបោះឆ្នោតអ្វីទៅ ?

**វ៉ាស្នា នួន :** មើលទៅមើ! បោះឆ្នោតកន្លងទៅហើយនេះ គ្រាន់តែតំបន់ "បែលវិឌ្យ" តែមួយជាប់តំណាងដល់ទៅ៧នាក់២នាក់ជាប់នៅតំបន់ "ព្រឌិតប៊ីល" រីឯតំបន់ "ហាយឡិន" ដែលមានខ្មែររស់នៅច្រើន ឬតំបន់ដែលមានជងភាគតិចរស់នៅមិនមានជាប់តំណាងណាម្នាក់ទេ ។ ខ្ញុំចង់ឃើញតំណាងនៃតំបន់និមួយៗមានតំណាងរបស់គេធ្វើដូចជានៅលីន ឬនៅបូសតុនជាដើមគេបោះឆ្នោតឱ្យដំណាងសង្កាត់គេនិមួយៗផង ហើយគេបោះ "អាត់ឡាច" គឺជាទូទៅក្នុងដំបន់ទាំងមូលផង ។ នៅឡូវែលគេបានបោះឆ្នោតរបៀបនេះម្តងដែរ តែគេលប់ចោលទៅវិញ ។

**ខ្មែរផុស :** ហេតុអ្វីទៅ ?

**វ៉ាស្នា នួន:** ពីព្រោះក្រុមប្រឹក្សាក្រុងហ្នឹងគេស្រឡាញ់ប្រព័ន្ធរបៀបហ្នឹង បើយើងសួរអ្នកជាប់ឆ្នោតទាំងហ្នុងថា "នរណាជាតំណាងតំបន់របស់ជនភាគតិច?" គេនឹងតបថា "ពួកអ្នកជាប់ឆ្នោតតំណាងឱ្យទាំងអស់គ្នាហើយទេតើ? ការពិតបើយើងមើលក្រុងខ្មែរតែមួយគ្មានភ្លើងបំភ្លឺ "តារាំងលេងបាល់៧-៨ឆ្នាំ គ្មាននរណារវល់ទេ អ្នកទាំងនោះគឺមានខ្លះទើបនឹងជាប់ឆ្នោតសាជាថ្មីជាច្រើនអាណត្តិមកហើយ ពេលខ្ញុំចូលមកដល់សាលាក្រុងទើបមានភ្លើងបំភ្លឺតារាងបាល់នឹងក្រុងខ្មែរនោះ" ។ ខ្ញុំមកហើយហ្នឹងក្តីយើងមានគ្នាតិចត្រូវបញ្ចុះបញ្ចូលសមាជិកឯទៀតៗឱ្យគាំទ្រសំណើរបស់យើង គឺត្រូវមាន៥នាក់ ប៉ុន្តែដូចជាសេចក្តីស្នើសើរីច្បាប់អន្តោប្រវេសន៍មួយដែលមានប្រយោជន៍ដល់ជនជាតិភាគតិចយើង ដូចជាសិទ្ធរស់នៅស្របច្បាប់របស់អ្នកដែលមកនៅស.រ.អា.លើសពី១០ឆ្នាំ ដូចជាគ្រួសារខ្លះមានកូនត្រូវចូលរៀនមហាវិទ្យាល័យតែសាលាតម្រូវឱ្យបង់ថ្លៃសាលាជាជនបរទេសមិនមែនជាប្រជាជនក្នុងតំបន់ទេ ដូច្នេះថ្ងៃ២ដងលើសគេសេចក្តីស្នើកែប្រែច្បាប់នោះបរាជ័យដោយគ្មានអ្នកគាំទ្រគ្រប់គ្រាន់ ។ មានសំណើរខ្លះ ក៏គេទទួលដែរ ដូចជាសំណើរឱ្យមានខ្មែរឬស្បានីស ចូលជា "កុមិស្សន៍រ" សម្រាប់ជួយសម្រេចកិច្ចការក្រុង ឥឡូវមានខ្មែរខ្លះហើយ ដូចជាអ្នកស្រី បុផា ពៅ ជាដើមគាត់ទើបនឹងឈរឈ្មោះជាបេក្ខជនក្រុមប្រឹក្សាក្រសួងអប់រំតែមិនបានជាប់ទេ ។

**ខ្មែរផុស:** តើច្បាប់បោះឆ្នោតក្រុមប្រឹក្សាក្រសួងអប់រំមានបញ្ហាដូចច្បាប់ក្រុមប្រឹក្សាសាលាក្រុងដែរ ឬទេ?

**វ៉ាស្នា នួន :** ដូចតែគ្នាហ្នឹង!

**ខ្មែរផុស :** តើគាត់មិនជាប់ឆ្នោត គឺជាផលវិបាកនៃច្បាប់បោះឆ្នោតនោះឬ?

**វ៉ាស្នា នួន :** មិនមែនទេ គឺគាត់មិនបានធ្វើអ្វីដែលការឃោសនារបស់បេក្ខជនម្នាក់ៗត្រូវធ្វើនោះទេ គាត់ដាក់ឈ្មោះចោលមិនបានទៅជួបអ្នកបោះឆ្នោតគេមិនស្គាល់គាត់នេះជាការសាកល្បងដំបូងរបស់គាត់ ។

**ខ្មែរផុស :** ឥឡូវនេះ លោកមកដល់សប្តាហ៍


វ៉ាសនា នួន ពិន សំខុន

ចុងក្រោយនៃអាណត្តរបស់លោកហើយងាកត្រឡប់ទៅក្រោយវិញ តើអ្វីខ្លះទៅដែលលោកបានធ្វើ? ហើយអ្វីខ្លះទៀតដែលនៅសល់មិនទាន់ធ្វើហើយៗ បើគ្មានខ្មែរនៅជាក្រុមប្រឹក្សាក្រុងទេ ស្នាដៃនឹងបាត់ទៅវិញ ឬក៏ទាល់តែមានខ្មែរផ្ញើតទៅទៀតបានបន្តបាន ?

**វ៉ាស្នា នួន :** អ្វីដែលយើងទទួលហើយនោះជឿថាមិនបាត់បង់ទាំងអស់ទៅវិញទេ ការរុញ board ofcommission នោះនៅតែព្យាយាមរុញ តែសង្ឃឹមឱ្យគេមកធ្វើឱ្យយើងនោះ អាហ្នឹងជាតួនាទីរបស់ខ្មែរគ្រប់រូបមិនមែនតែ២-៣នាក់ ថ្មីបានជោគជ័យនោះទេ ។

**ខ្មែរផុស:** សហគមន៍ខ្មែរត្រូវធ្វើយ៉ាងម៉េច ដើម្បីឱ្យបានមនុស្សចូល "កុមីស្យុង" នោះ? ត្រូវប្រមូលគ្នាតែងតាំងតំណាងឱ្យចូល "កុមីស្យុង"?

**វ៉ាស្នា នួន :** យើងអាចដាក់ពាក្យទៅនាយកសាលាក្រុង City manager តែត្រូវតែមានការនាំតាមរយៈក្រុមប្រឹក្សាក្រុងដែរ គឺត្រូវមានការគាំទ្រពីក្រុមប្រឹក្សាក្រុមភាគច្រើន... កន្លងមកគេមិនសូវអើពើណែនាំឱ្យយើងដាក់ចូលទេ ជាពិសេសចូល "កុមីស្យុង" សំខាន់១៤នោះដូចជានៅ Planning board, Conservation, Housing, License ជាដើម បើគ្មានខ្មែរអង្គុយនៅទីនោះទេ ការសម្រេចរបស់ "កុមីស្យុង.ទាំងនោះឥតបានជាប្រយោជន៍ដល់សង្គមទេ ដូចជានៅប៉ៃលិននៅហុងកុងអីៗឥតបានមកជិតដិតដល់សង្គមទេ ! ធ្វើតាមតែគេសម្រេចទៅ... នៅខាងគណកម្មការខាងលំនៅដ្ឋានជាដើមស្មានថាខ្មែរមិនមានអ្នករកទិញផ្ទះទេឬ? បើមានខ្មែរនៅក្នុង Commission housing នោះគេអាចជួយពន្យល់ ឬណែនាំឱ្យបានច្បាស់លាស់អំពីការប្រុងទិញផ្ទះរបស់ពលរដ្ឋខ្មែរបាន ។

**ខ្មែរផុស:** យើងមិនដែលឮលោកបញ្ចេញយោបល់ក្នុងតួនាទីជាសមាជិកក្រុមប្រឹក្សាក្រុងឡូវែលអំពីរឿងអាជ្ញាប័ណ្ណវត្តខ្មែរឡូវែលរបស់ព្រះតេជគុណ សៅ ឃន នៅឡើយ តើវត្តនោះអាចសង់បានឬក៏មិនបាន ?

(នៅមានតទៅលេខក្រោយ)



## តមកទំព័រទី ១៧ ពិធីជប់លៀងប្រចាំឆ្នាំរបស់ក្រុងខ្មែរ

មួយចំនួននៅសមាគមន៍ខ្មែរផាក់ប៉ៃលិនក្លឹបក្មេងប្រុស និងក្មេងស្រីព្រមទាំងនៅខាប់ផលស្ដែរ ។ លើសពីនេះ មានការប្រារព្ធនូវទិវាវប្បធម៌តួយ៉ាងបុណ្យចូលឆ្នាំ




ខ្មែរពីរឆ្នាំជាប់គ្នា ។ រីឯគម្រោងដែលនឹងត្រូវធ្វើបន្ត លោកបណ្ឌិតក៏បានមានប្រសាសន៍ផងដែរថា ក្រុងខ្មែរគ្រោងនឹងកសាងរូបសំណាកព្រហ្មណ៍បាយ័នមុខ៤ រំឮកដល់ភាពសម្បូរសប្បាយរុងរឿងក្នុងសម័យអង្គរ សម័យដែលអតីតក្សត្រខ្មែរព្រះបាទជ័យវរ្ម័នទី៧ ទ្រង់ប្រកាន់យកនូវព្រហ្មវិហារធម៌ទាំងបួន មានមេត្តា ករុណា មុទិតា និងឧបេក្ខា ហើយគោលបំណងសំខាន់នៃរូបសំណាកព្រហ្មបាយ័ននេះ គឺសំដៅយកគុណធម៌នេះ មកផ្សព្វផ្សាយដល់សង្គមខ្មែរអាមេរិកាំងចូលរួមបង្រួបបង្រួម និងសាមគ្គីគ្នាអាស្រ័យដោយមានការបែកបាក់ប្រេះឆាដោយប្រការផ្សេងៗក្នុងសហគមន៍ ។ ជាមួយគ្នានោះ កម្មវិធីជប់លៀងខាងលើក៏ជាឱកាសមួយដែលក្រុងខ្មែរធ្វើការលើកទឹកចិត្តប្រជាជនខ្មែរអាមេរិកាំងទាំងអស់ដែលចូលសញ្ជាតិ ហើយមានសិទ្ធបោះឆ្នោតទៅចូលរួមរាល់ការបោះឆ្នោតទាំងអស់ដែលមាន ព្រោះការបោះឆ្នោតជាឱកាសដែលប្រជាជនអាចប្រើប្រាស់សិទ្ធរបស់ខ្លួន និង អាចស្នើនូវសេចក្ដីប្រាថ្នាដែលខ្លួនចង់បាន ហើយដែលបម្រើប្រយោជន៍ប្រជាជនទាំងអស់គ្នា ៕



## តមកទំព័រទី ២០ សូមស្វាគមន៍ឆ្នាំ២០១៤

ចូលចិត្តសរសេរពីព័ត៌មាន និងការវិវត្តន៍ក្នុងសង្គមដែលខ្លួនឯងរស់នៅច្រើនជាងក្រុមទី១ ដែលមានចំណូលចិត្តសរសេរពីកម្ពុជានយោបាយ ឬសេដ្ឋកិច្ច ។ នៅមានអ្នកនិពន្ធម្នាក់ទៀត គឺ លោក ម៉ៅ ចាន់សំណុំ ដែលជាអ្នកមានបទពិសោធន៍ខាងសមាជិគាត់ចូលចិត្តនិពន្ធពីដំណើរ


ភីរូ និង ឆាយ ហុង


លី ឆឹត

ផ្លូវចិត្តរកឃើញដោយខ្លួនលោកផ្ទាល់ប្រៀបធៀបទៅនឹងវិទ្យាសាស្ត្រសកលដែលមានពីមុនមក ។ តែសាររបស់យើងក៏មានការដកស្រង់ពីតម្រានានា សម្រាប់ជួយកែសម្ផស្ស ឬបច្ចេកទេសសម្រាប់សម្រួលសុខភាព ដោយអ្នកនិពន្ធអានាមិក តែយើងយល់ថា សារដែលយើងបានបញ្ចូនហើយអ្នកអានជាច្រើនរង់ចាំ គឺទំព័រហោរាសាស្ត្រ ដែលហាក់ដូចជាមានប្រជាប្រិយភាពជាងគេ ។

រីឯការនាំសារខាងពាណិជ្ជកម្មវិញ អ្នកមកផ្សព្វផ្សាយជាច្រើនបានប្រឹងប្រែងបញ្ចូនសារតាមខ្មែរផុសយ៉ាងរន្ថើនគួរឱ្យចង់តាមដាន យើងអាចចាត់ទុកថា ផ្សាយពាណិជ្ជកម្មតាមទំព័រកាសែតខ្មែរផុសមានប្រសិទ្ធភាពគ្រាន់ បើយើងសង្កេតច្បាស់នាថ្ងៃបុណ្យអុំទូកដែលអ្នកស្រុកក្រៅជាច្រើនមកកាន់ក្រុងឡូវែលឃើញភោជនីយដ្ឋានដែលផ្សព្វផ្សាយលើទំព័រខ្មែរផុសមានភ្ញៀវមកបន្តកន្ទុយរង់ចាំក្នុងនេះ រីឯហាងឯទៀតៗមានសភាពស្ងប់ស្ងាត់ ព្រោះគេពុំដឹងរកឯណាឃើញ ហើយប្រសិទ្ធភាពនៃការផ្សព្វផ្សាយនេះ គឺប្រាកដជាឆ្លាំងបាយពាណិជ្ជកម្មរបស់ខ្មែរផុសហើយ ។

ខ្មែរផុសស.រ.អានឹងសហការីទាំងអស់ សូមជូនពរ "Merry Chrismas" និង "Happy New Year" ៕

## តមកទំព័រទី ១០ សាលាក្រុងប្រារព្ធការស្វាគមន៍...

និងមិត្តភក្តិរបស់ពួកគេ ។

បញ្ជីឈ្មោះអាហារដែលបម្រើជាអាហារដល់ភ្ញៀវចូលរួមជាប្រភេទអាហារអាស៊ីដែលត្រូវបានកុម្ម៉ង់ពីភោជនីយដ្ឋានក្នុងតំបន់មាន អេករ៉ូលកាហ្វេ វៀតថៃ ប្រ៊ីដអាវេកខិននឹងខុហ្វហ្វិហោស៍ និងកាហ្វេប៉ាទីឆេ ។ លោកទីប្រឹក្សាក្រុង វ៉ាសនា ទួន បាននាំយកនូវសាច់គោចង្កាក់ដែលជាស្នាដៃពីផ្ទះរបស់លោកផ្ទាល់ជូនជាអាហារក្នុងកម្មវិធីនោះ ។ ចំណែកឯការកំសាន្តកម្មវិធីត្រូវបានបង្ហាញដោយការិយាល័យសិល្បៈនៃវិទ្យាល័យឡូវែល និងអ្នកបង្ហាញស្បៀករហស្សកម្មល្បីឈ្មោះ គឺ ហ៊ិនរី ។

អភិបាលក្រុងផាទ្រីក មឺហ្វី ជ្រើសរើសក្នុងការមិនបន្តរកការបោះឆ្នោតជាថ្មីក្នុងឆ្នាំ២០១៣ ហើយលោកនឹងបញ្ចប់ការងាររបស់លោកនៅខែមករា បន្ទាប់ពីបានបម្រើការងាររយៈពេល ២ឆ្នាំជាអភិបាលក្រុង និងធ្លាប់ជាទីប្រឹក្សាក្រុងពីមុនមក ។ ខណៈបម្រើការងារក្នុងតំណែងលោកអភិបាលក្រុងផាទ្រីក មឺហ្វីបានបំពេញការងារនឹងបានពង្រីកសកម្មភាពចូលដល់សហគមន៍ខ្មែរអាមេរិកាំងក្នុងតំបន់ឡូវែល ហើយទំនងជាបច្ច័យដែលសួនប៉ៃលិនមានភ្លើងបំភ្លឺបម្រើប្រយោជន៍ប្រជាជនកំសាន្តនៅទីនោះក្នុងពេលយប់ ។ ប្រជាជន និងអ្នកចូលរួមក្នុងកម្មវិធីរាត្រីនោះ បានចាត់ទុកកម្មវិធីខាងលើជារាត្រីដ៏ពិសេស និងជាអនុស្សាវរីយ៍ដ៏ល្អចងចាំពីការបម្រើការងាររបស់អភិបាលក្រុងផាទ្រីក មឺហ្វី ៕

# ប្រជាជនខ្មែរនៅប្រទេសកម្ពុជា និងខ្មែរនៅសហរដ្ឋអាមេរិក

## បទពិសោធន៍ពីរដោយឡែកពីគ្នា

ទិដ្ឋភាពធ្វើស្រែចំការ
ការប្រកបរបរកសិកម្ម នៃកសិកម្មខ្មែរ



ទិដ្ឋភាពឈូសព្រិលខ្មែរនៅឡូវែលសហរដ្ឋអាមេរិក
នៅថ្ងៃអាទិត្យខែធ្នូឆ្នាំ២០១៣ កំពុងឈូសព្រិល
ចេញពីឡាន ផ្លាមុខផ្ទះ



# ការហាត់ប្រាណជួយឱ្យដំណេកលក់ស្កប់ស្កល់





បើតាមរបាយការណ៍ថ្មីមួយបានឱ្យដឹងថា ការធ្វើលំហាត់ប្រាណអាចជួយសម្រួលដល់ការទទួលទានដំណេក ហើយការហាត់ប្រាណកាន់តែច្រើន គឺកាន់តែមានប្រសិទ្ធភាពខ្លាំង ។

ការធ្វើលំហាត់ប្រាណត្រឹមតែ១៥នាទីក្នុងមួយថ្ងៃ ក៏អាចកែប្រែគុណភាពនៃការទទួលទានដំណេកដែរ ។

លោកម៉ាក្សហ៊ីស្គូវីដដែលជាអ្នកស្រាវជ្រាវពាក់ព័ន្ធនឹងការទទួល ទានដំណេក និងជាអ្នកដឹកនាំការស្រង់មតិបាននិយាយឱ្យដឹងថា "យើងបានរកឃើញការហាត់ប្រាណ និងការគេងបានស្កប់ស្កល់ គឺទៅជាមួយគ្នា ។ យើងក៏បានរកឃើញផងដែរថា គុណភាពនៃការទទួលទានដំណេក គឺកើនជាដំណាក់១ជាមួយនឹងការហាត់ប្រាណច្រើន ឬតិច ។ ដូចនេះ ប្រសិនបើអ្នកហាត់ប្រាណច្រើនអ្នកអាចនឹងមានភាពងាយស្រួលក្នុងការទទួលទានដំណេក ហើយសម្រាប់មនុស្សដែលមិនហាត់ប្រាណសោះនោះ គេនឹងមានបញ្ហាក្នុងការទទួលទានដំណេក" ។ ការសិក្សាស្រង់មតិដំបូងក្នុងការកំណត់សេចក្ដីលម្អិតនៃគុណប្រយោជន៍ពីការធ្វើលំហាត់ ប្រាណដែលមានលក្ខណៈជាតិ ។

មនុស្សភាគច្រើន ដែលនិយាយថា ពួកគេចូលចិត្តហាត់ប្រាណត្រូវបានគេរាយការណ៍ថា មានការទទួលទានដំណេកប្រសើរជាងអ្នកដែលមិនបានហាត់ប្រាណជារៀងរាល់ថ្ងៃ ៕

តមកពីទំព័រទី ៨ ## ធុងសម្រាប់ដាក់កកសំណល់...

សូមសរសេរអាស័យដ្ឋានរបស់អ្នកឱ្យបានច្បាស់លាស់នៅពីក្រោមគម្របធុង។

ប្រធានបទនៃកម្មវិធីការកែឆ្នៃ ស៊ីងហ្គល ស្ទ្រីម ថ្មី ឬ SSR គឺ "រួមគ្នាធ្វើទាំងអស់គ្នា" ជាការរៀបទុកដាក់កាកសំណល់ផលិតឡើងវិញចំរុះ មានក្រដាស ក្រដាសរឹង ទឹកដោះគោ , កេសទឹកកាសែត និងទស្សនាវដ្ដី សំណល់ប៉ាហាំង, អាលុយមីញ៉ូ កំប៉ុង ដែកថែប និងប្លាស្ទិច ប្រអប់។

អត្ថន័យទីពីរប្រធានបទនេះ សំដៅទៅលើសមត្ថភាព សម្រាប់ប្រជាជន មានសិទ្ធិបោះឆ្នោតទាំងអស់ឱ្យចូលរួមនៅក្នុងការកែឆ្នៃ ។ ការសិក្សាថ្មីមួយបានរកឃើញថា ប្រហែលមួយភាគបីនៃគ្រួសារបានដាក់ចេញសម្រាប់ការប្រមូល Recycling ។ លក្ខណៈពិសេសនៃកម្មវិធីថ្មីនេះ គឺជាសេវាកម្មមួយដែលមានមូលដ្ឋាន (និងកម្មវិធីស្មាតហ្វូន) សម្រាប់ប្រតិទិនផ្ទាល់ខ្លួន , ជាវដោយស្វ័យប្រវត្តិ ការរំឭក ថ្ងៃប្រមូល និងព័ត៌មានទាន់ហេតុការ។ ទស្សនាទំព័រ ស៊ីង - ស្ទ្រីម កែច្នៃ នៅ www.LowellRecycle.org ដើម្បីរកមើលពណ៌កន្ត្រកទំនិញរបស់អ្នកបោះពុម្ពចេញប្រតិទិនផ្ទាល់ខ្លួន និងការចុះឈ្មោះសម្រាប់ការរំលឹក ។

ប្រសិនបើអ្នកមានសំណួរ ឬមតិយោបល់អំពីការទុកដាក់គ្រប់គ្រងកាកសំណល់រឹង សូមទាក់ទងលេខទូរស័ព្ទ៩៧៨-៦៧៤-៤៣០៩ រាល់ម៉ោងធ្វើការពីថ្ងៃចន្ទ ថ្ងៃសុក្រ វេលាម៉ោង ៨:៣០នាទីព្រឹកដល់ម៉ោង៥ល្ងាច ។ ព័ត៌មានពីការគ្រប់គ្រងសំរាមមានលេខទូរស័ព្ទ ៨០០-៩៧២-៤៥៤៥ ដើម្បី ណាត់ជួប ការប្រមូល curbside និងលក្ខខណ្ឌផ្សេងទៀតត្រូវបានអនុវត្ត ៕



Continued from Page 05 ## Single-Stream Recycling

The same for Tuesday, Wednesday, Thursday and Friday routes; the lid color will determine the week of collection. The first week of January (after the New Year's holiday on Wednesday, Jan. 1) will be a green week, followed by a blue week. Every-other-week recycling collection will continue, alternating green and blue. As with trash pickup, collection will be bumped back a day during holiday schedules.

This new program will not add any cost to residents' refuse bill; efficiencies and savings will pay for the carts over five years. Also, there will be no change to the schedule of burgundy city trash carts; trash will be collected every week, on the regular neighborhood trash day. The use of purple overflow trash bags will also continue.

In the spring, weekly curbside yard-waste collection will continue as before. It is suggested that you re-label your current bottles-and-cans recycling barrels for use as yard-waste barrels. Free stickers are available at City Hall and DPW at 1365 Middlesex St).

As for your current green, 18-gallon curbside recycling bins, the Solid Waste & Recycling Office suggests you keep them indoors (mud-room, breezeway or garage) to collect acceptable recyclables; when full, bring the material out to the new cart. You should begin to collect recyclables once your cart arrives write your address on the underside of the lid; but don't place it curbside until the appropriate collection day in January.

The theme of the new single-stream recycling, or SSR, program is "All Together Now," which has a double meaning.

First, it describes the collection method; all acceptable materials go together in the same cart. Mixed-paper, cardboard, milk/juice cartons, newspaper and magazines will go in the same container as clean glass, tin/aluminum, steel cans and plastic (#1-#7) containers. The list of undesirables still includes: plastic (film) bags, Styrofoam (EPS #6) and soiled pizza boxes.

SSR carts should not be used to dispose of trash, electrical cords or garden hoses, and flammable or hazardous material, like paints or propane tanks.

The theme's second meaning refers to the ability for all eligible residents to participate in recycling. A recent study found that about a third of households placed recycling out for collection. That apathy led to a poor recycling rate of only 14 percent. With "All Together Now" as the driving force over the next few years, Lowell's rate should climb by 10 percent. Other means will allow some addresses to opt in to curbside recycling, while others can participate by recycling at the new Resource Recovery Center (RRC), expected to open in mid-January.

By 2015, Lowell's recycling rate should be in the low 30s, with a diversion rate of nearly 50 percent, rivaling that of Worcester.

One exciting feature of the new program is an opt-in, web-based service (and smartphone app) for custom collection calendars, subscription to automated collection-day reminders and emergency alerts. Visit the Single-Stream Recycling page at www.LowellRecycle.org to look up your cart color, print out custom calendars and register for reminders. If you have questions or comments, call the Solid Waste & Recycling Hotline at 978-674-4309; it is staffed Monday through Friday, 8:30 a.m. to 5 p.m. After hours, feel free to leave a message.

After Jan. 2, eligible households can call Waste Management at 800-972-4545 to make curbside collection appointments for white-goods, TVs and furniture; nominal collection/processing fees will apply.

# ខ្ញុំឡើងតុលាការ




**ដោយ : គឹម ភៀន**
**ហ្វីឡាដែលហ្វៀ**

សូមឱ្យបងប្អូនខំចូលរួមឱ្យបានកាន់តែច្រើនកាន់តែល្អ... វត្តជាវត្តរបស់ខ្មែរយើងទាំងអស់គ្នាអង្គការសហព័ន្ធខ្មែរកម្ពុជាក្រោមជាអង្គការរបស់ខ្មែរយើងទាំងអស់គ្នាខ្មែរមានតែមួយរួមរស់ជាមួយគ្នាទើបគង់វង្ស បើផ្ទុយពីនេះយើងត្រូវវិនាសហើយវេទនាជាងសម័យមុនដែលបាត់កម្ពុជាក្រោមបាត់ខ្មែរខាងលើទៅពួកសៀម ហើយមួយចំណែនទៅលាវនៅចំប៉ាសក្តិនោះទៅទៀត... ចូរយើងរួមសច្ចារផឹកដំណក់ឈាមស្បថជាមួយគ្នាថា យើងឈប់ប្រើទូវផ្លាកសញ្ញា(ខ្មែរត្រើយកើតខ្មែរត្រើយលិច) ទៀតចាប់ពីថ្ងៃនេះតទៅអ្នកនិពន្ធចាស់ជរាសក់សសំពោង ភ្នែកមើលទៅមុខឃើញរបស់មួយបែកជា២ជាពនេះ នៅតែហូរទឹកភ្នែកពេលឃើញខ្មែរ ឬណាម្នាក់ដើរចេញពីសហគមន៍ខ្លួនទៅរស់ជាមួយសហគមន៍ផ្សេងទៀត ព្រោះមកតែពីបាក់បែកគ្នា។

ភ្ញាក់ខ្លួនឡើងបងប្អូនរួមឈាមដ៏កំសត់របស់ខ្ញុំ! ដល់ពេលហើយកុំចង់បង្ហូរឈាមគ្នាទៀត ឈាមហូរដោយឥតន័យច្រើនហើយ។

ដោយទាំងពីរក្រុមមិនព្រមជួបគ្នាពិគ្រោះការងារនេះឱ្យបានដឹងឮគ្រប់ៗគ្នា ហេតុនេះការយល់ដឹងពីរឿងទំនាស់នេះបានមកតែពីគូវិវាទម្ខាងៗគឺបានដឹងតែមួយជ្រុងបញ្ហាក្រុមណាក៏ប្រកាន់តែត្រូវរៀងៗខ្លួនយើងមិនអាចវិនិច្ឆ័យឱ្យត្រូវបានទេ ហេតុនេះមិនអាចជួយរកផ្លូវកណ្តាលឱ្យសមចិត្តបងប្អូនទាំងសង្ខាងបានទេ ។ ក្រោយពីឡើងទៅស្តាប់តុលាការបានពីរដងនេះ ខ្ញុំយល់បានដោយបណ្តោះអាសន្នយ៉ាងនេះ :

**១.** ក្រុមអ្នកជាប់ឆ្នោតមានប្រធានឈ្មោះ ង៉ោ ថាច់ង៉ុក មានបំណងដេញព្រះសង្ឃ២អង្គចេញពីវត្តសុរិយវង្ស៊ី ទើបខ្លួនរៀបចំវត្តអារាមនេះបាន។

**២.** ក្រុមទី២ជាក្រុមអះអាងថា ខ្លួនគ្មានបានបោះឆ្នោតទេ ហើយការពារឱ្យព្រះសង្ឃពីរអង្គនោះគង់នៅក្នុងវត្តទៅទៀត ដើម្បីដឹកនាំពុទ្ធបរិស័ទតទៅទៀត ព្រោះព្រះអង្គទាំងពីរព្រះអង្គពុំមានកំហុសអ្វីធ្ងន់ដល់ថ្នាក់បណ្តេញបំបរព្រះអង្គចេញពីវត្តសោះ ។ ព្រះសង្ឃទាំងពីរអង្គមានព្រះនាមថា អៀង ភីរុណ នឹងយ៉ាន់ តួន ។ អ្នកដឹកនាំក្រុមមិនបានបោះឆ្នោតនេះមានឈ្មោះថា លោក ហាំង រឿង ។

ការយល់របស់ខ្ញុំនេះអាចខុសដែរ សូមអស់លោកទាំង២ក្រុមអត់ឱនទោសឱ្យខ្ញុំ ហើយមេត្តាកែតម្រូវ ដើម្បីប្រយោជន៍រួមផង។

ដើម្បីបង្ហាពីមូលហេតុដែលធ្វើឱ្យក្រុមឈ្នះឆ្នោតដេញព្រះសង្ឃមានដូចតទៅនេះ ខ្ញុំសរសេរនេះ តាមការស្តាប់ពាក្យចោទនៅតុលាការពីខាងដើមចោទ។

**ក.** ព្រះសង្ឃ អៀក ភីរុណ បានលួចលុយចំនួន២លើកមួយលើក១ម៉ឺនដុល្លារ។

**ខ.** ព្រះអង្គបានលួចលុយមុនចេញពីវត្តមួយនៅ Florida មកកាន់វត្តសុរិយវង្ស៊ីនេះ ។

**គ.** ព្រះសង្ឃជាអគន្តុកមកនៅវត្តនេះគ្មានបានបង់ថ្លៃឈ្នួល។

ចំណែកឯចុងចោទពុំទាន់បានចោទប្រកាន់អ្វីនៅឡើយទេ គ្រាន់តែការពារខ្លួនតែប៉ុណ្ណោះ។ អ្នកដែលបានតុលាការហៅឡើងទៅបំភ្លឺនោះមានលោកគ្រូ ថាច់ស៊ីណា ព្រះតេជគុណ អៀក ភីរុណ អ្នកស្រីស៊ុនធីនិត្យលោក ត្រឹងម៉ានីរិន... ចំណែករឿងចោទថា ព្រះតេជគុណអៀង ភីរុណ បានលួចលុយវត្តម្តង ១ម៉ឺនដុល្លារនោះ ព្រះអង្គបានបង្ហាញវិកយប័ត្រច្បាស់លាស់សម្រាប់បង្ហាញតុលាការរួចហើយ១ម៉ឺនដុល្លារដំបូងលោកបានទៅបើកពីធនាគារយកមកចូលបុណ្យសពព្រះតេជគុណជា ហឿង ដែលមានលោកជា ហេន ជាអ្នកទទួលដោយមានចុះហត្ថលេខាត្រឹមត្រូវ។ ១ម៉ឺនដុល្លារលើកទី២ ព្រះអង្គ អៀង ភីរុណ បានទៅមើលយកមកទុកចេញថ្លៃទឹកភ្លើង និងតម្រូវការផ្សេងក្នុងវត្តអារាម ។ ចំណែកពាក្យចោទប្រកាន់ថា ព្រះអង្គបានលួចលុយរត់ចេញមកពី Florida មកស្នាក់នៅវត្តសុរិយវង្ស៊ីនោះ ព្រះអង្គបានបង្ហាញនូវលិខិតបញ្ជាក់មួយច្បាប់ចេញដោយគណៈកម្មការវត្ត Florida ហើយកាន់មកប្រគេនព្រះអង្គដោយព្រះចៅអធិការវត្ត Florida នោះតែម្តងដែលមានព្រះនាមថា គី ចាន់ ថាលិខិតបញ្ជាក់ថា ព្រះអង្គ អៀង ភីរុណ គ្មានកំហុសដូចគេមួយបង្កាច់ព្រះអង្គនោះឡើយ ។ ឯរឿងចោទព្រះអង្គយ៉ាន់តួចជាអគន្តុកនោះពិតជាមិនត្រឹមត្រូវទេ ព្រោះព្រះអង្គបានត្រូវបំបួសនៅវត្តសុរិយវង្ស៊ីនេះតែម្តង ហើយព្រះសង្ឃគ្មានត្រូវការបង់លុយឈ្នួលទីស្នាក់នៅថ្លៃបាយទឹកអ្វីទេ ពេលគង់នៅវត្តខ្មែរទាំងឡាយ ។ ចំណែកព្រះអង្គ អៀង ភីរុណ វិញនិមន្តមកគង់នៅស៊ុរិយវង្ស៊ី ដោយឧបាសកឧបាសិការវត្តសុរិយវង្ស៊ី បាននិមន្តព្រះអង្គឱ្យមកគង់នៅវត្តអារាមនេះ ដើម្បីជួយការងារខាងសង្ឃកិច្ច ព្រោះសុរិយវង្ស៊ីមានតែព្រះអង្គជាហឿង មួយព្រះអង្គឯងណាមួយព្រះអង្គរូបនេះមានជរាពាធផង។

ខ្ញុំស្តាប់បានតែត្រឹមណឹង ក៏ត្រូវចេញមកផ្ទះចាំទទួលចៅចេញមកពីសាលា ។ ពុំបានដឹងរឿងអ្វីបន្ថែមទៀតទេ ។ ក្រោយមកក៏បានសួរតាមទូរស័ព្ទទៅអ្នកស្រីសីនផិនិត ក៏បានដឹងថា តុលាការបើកសវនាការសម្រាប់រឿងបងប្អូនរួមឈាមយើងនៃវត្តសុរិយវង្ស៊ីនៅថ្ងៃទី២នឹងទី៣ ខែធ្នូជាថ្មីទៀត សូមបងប្អូនរួមលោហិតអញ្ជើញមកស្តាប់ឱ្យបានកោះករគ្រាន់ពិចារណាឱ្យបានត្រឹមត្រូវ ហើយរកផ្លូវល្អណាមួយជួយឱ្យបងប្អូនយើងរួមរស់សុខដមរម្យនាជាមួយគ្នាឡើងវិញឱ្យខាងតែបានតរៀងទៅ ។

ដំណឹងចុងក្រោយថ្ងៃនេះគឺថ្ងៃទី២០ខែ វិច្ឆិកា ឆ្នាំ២០១៣ ម៉ោង១និង១៥នាទីល្ងាច ព្រះអង្គ យ៉ាន់ តួន បានទូរស័ព្ទមកជូនព័ត៌មានដែលខ្ញុំពុំបានដឹង ព្រោះខ្ញុំបានចេញមុនម៉ោងបញ្ចប់សាវនាការនៅតុលាការ ។ ដំណឹងបានឱ្យដឹងថា ការអនុម័តរបស់តុលាការថ្ងៃនោះបានបញ្ជាក់ច្បាស់ថា ការបោះឆ្នោតនៅពុំបានការ ព្រោះបានប្រកាសថាលុបចោលទៅហើយបែរកមបោះឡើងវិញយ៉ាងនេះគឺមិនត្រឹមត្រូវ។

រឿងដេញព្រះសង្ឃ គឺមិនត្រឹមត្រូវទេ បើមានរឿងអ្វីតវ៉ាផ្សេងទៀត អាចមកតវ៉ាបានតែបើរឿងបោះឆ្នោតវាត្រូវចប់តែត្រឹមហ្នឹង ។

អ្នកនិពន្ធចាស់សក់សពពឹមពពើមនេះ បានធូរទ្រូងបន្តិចព្រោះដឹងថា ជម្លោះនេះបានជិតចប់ហើយ សូមបងប្អូនក្លាហានឡើងហ៊ានទទួលអ្វីដែលខ្លួនធ្វើខុស ដើម្បីកែប្រែឯអ្នកបានពេញចិត្តនឹងការតវ៉ារបស់ខ្លួន សូមបើកចិត្តឱ្យទូលាយរង់ចាំទទួលបងប្អូនដែលមានកំហុស។ កុំភ្លេចបណ្តាំរបស់ព្រះគ្រូយើង

**តទៅលេខក្រោយ**

## តមកពីទំព័រទី ៤ ទស្សនៈកិច្ចរបស់អនុប្រធានគណបក្ស...

បោះឆ្នោត ហ៊ុន សែន បែរជាលែងស្មៀត "សាមកុក" ម្តង ព្រោះហាក់លំបាកក្នុង និងដឹងច្បាស់អំពីបរាជ័យរបស់បក្សខ្លួន ។

សូមជម្រាបថា : ក្នុងដំណើរទស្សនៈកិច្ច ១០ថ្ងៃរបស់អនុប្រធានបក្សប្រឆាំងរូបនេះ លោក កឹម សុខា បានធ្វើដំណើរទៅកាន់រដ្ឋនានាចំនួនប្រាំពីរក្នុងសហរដ្ឋអាមេរិក ដើម្បីជួបអ្នកគាំទ្រ និងសួរសុខទុក្ខដល់សកម្មជនរបស់ខ្លួន ។ ចំណែកថវិកាដែលបានពីរិភាគទានសប្បុរសជននានាឱកាសនោះបានចំនួនជាង១ម៉ឺនដុល្លារអាមេរិក ៕



# ដំណឹងល្អ




លោកតាម្នាក់មានជំងឺមហារីកថ្លើមដល់ថ្នាក់ក្រិនជិតអស់ថ្លើមទាំងមូលហើយៗ អាយុជិត៨០ឆ្នាំទៅហើយនោះអាចមើលជាបាន ។

ដូច្នេះប្រសិនបើលោកអ្នក ឬសាច់សារលោហិតណារបស់លោកអ្នកមានជំងឺមហារីក រហូតដល់គ្រូពេទ្យបារាំង ឬអាមេរិកាំងមើលមិនជាឱ្យចេញពីពេទ្យមកផ្ទះវិញនោះ កុំអាលអស់សង្ឃឹម សុំទាក់ទងនឹងគ្រូផ្សំថ្នាំបូរាណខ្មែរ ផ្សំនឹងប្រតិបត្តិវិបស្សនាកម្មដ្ឋាន អាចជួយឱ្យអស់លោកអ្នកបានជាសះស្បើយមិនខាន ។ អាចព្យាបាលគ្រប់នែមហារីក, មហារីកសួត, ថ្លើម, ក្រពះ, មាត់ស្បូន, ។ល។

សុំទាក់ទងនិងលោកគ្រូពេទ្យ គឹម ភៀន ទូរស័ព្ទលេខ ២៦៧-៤២៣-៨១៨៧ ដើម្បីបានជ្រាបពីព័ត៌មានពិសេសនេះលំអិតបន្ថែម ។

តមកពីទំព័រ ១៦

# ក្រុមអ្នកតវ៉ាបន្តសកម្មភាពប្រមូលផ្តុំ....

ឧត្តមសេនីយ៍សព្វរបស់ពួកយើង ក៏ប៉ុន្តែពួកយើងមិនព្រមទេ ហើយប្រសិនបើពួកគេចង់បានវាពួកគេត្រូវសម្លាប់យើងជាមុនសិន"។

ក្រុមនេះត្រូវបានអះអាងថា មានការពាក់ព័ន្ធជាមួយគណបក្សសង្គ្រោះជាតិ ក៏ប៉ុន្តែលោក ស្រី មូរ សុខហួរ ប្រធានកិច្ចការសាធារណៈរបស់គណបក្សនេះកាលពីថ្ងៃអង្គារបានអះអាងថា គណបក្សប្រឆាំងមិនមានការពាក់ព័ន្ធជាមួយបុព្វហេតុរបស់ក្រុមនេះទេ។ ពួកគេបាននិយាយថា ពួកគេសង្ឃឹមថា នឹងតតាំងជាមួយរដ្ឋាភិបាលជុំវិញការបោះឆ្នោតជាតិ កាលពីខែកក្កដាដែលបានបង្កឱ្យមានវិវាទកើតឡើង។

នៅវេលាម៉ោង៨ព្រឹកកាលពីម្សិលមិញពួកគេត្រូវបានស្នើឱ្យចាកចេញពីមុខស្ថានទូតបារាំង និងបានឈប់នៅវត្តកោះដែលត្រូវបានបិទវេលាម៉ោងប្រហែល១១ព្រឹក។ នៅទីនោះពួកគេបានជួបលោក ឃួង ស្រេង អភិបាលរងរាជធានីភ្នំពេញតំណាងសង្កាត់មួយរូប និងនគរបាលចរាចរ ។ បន្ទាប់ពីមានការចរចាគ្នាពីរលើកក្រុមអ្នកតវ៉ានេះត្រូវបានអនុញ្ញាតឱ្យចេញពីវត្តកោះ ដោយព្រះសង្ឃប្រាំមួយអង្គដែលបានមានសង្ឃដីកាថា អាជ្ញាធរគ្មានសិទ្ធិបិទក្លោងទ្វារវត្តទេ។ បន្ទាប់មកពួកគេក៏បានធ្វើដំណើរទៅទីលានប្រជាធិបតេយ្យបន្ទាប់ពីមិនយល់ព្រមត្រឡប់ទៅស្ថានទូតបារាំង ឬក៏ទៅកាន់ស្ថានទូតជប៉ុនតាមផែនការរបស់ពួកគេ។

ទោះបីជាយ៉ាងណានៅវេលាម៉ោង២រសៀលពួកគេបានជួបអ្នកតវ៉ាមួយក្រុមដែលមកពីសហគមន៍បឹងកក់ ហើយក៏បានត្រឡប់ទៅស្ថានទូតបារាំងវិញ ជាហេតុធ្វើឱ្យនគរបាលមានការស្រងាកចិត្ត ដោយសារតែខ្លួនបានព្យាយាមជំរុញឱ្យពួកគេត្រឡប់ទៅទីលានប្រជាធិបតេយ្យវិញ ក៏ប៉ុន្តែទទួលបរាជ័យក្នុងការធ្វើបែបនេះ។

លោក ជួន ណារិន ស្នងការរងនគរបាលរាជធានីបានមានប្រសាសន៍ថា "យើងបានឯកភាពគ្នាថា ពួកគេនឹងត្រឡប់ទៅទីលានប្រជាធិបតេយ្យវិញ ក៏ប៉ុន្តែឥឡូវនេះម៉េចបានជាពួកគេដូរចិត្ត និងចង់ទៅស្ថានទូតបារាំងទៅវិញ"។

នៅឯស្ថានទូតបារាំងក្រុមអ្នកតវ៉ាបានប្រគល់ញត្តិមួយ ដើម្បីអំពាវនាវសុំជំនួយជំរុញឱ្យរដ្ឋាភិបាល "គោរពច្បាប់" និងគោរពកិច្ចព្រមព្រៀងទីក្រុងប៉ារីសឆ្នាំ១៩៩១"។ អ្នកតវ៉ាមួយរូបបាននិយាយថា "យើងមិនមានរដ្ឋាភិបាលស្របច្បាប់ទេ"។ អ្នកតវ៉ាមួយរូបផ្សេងទៀតឈ្មោះ អ៊ុក ពេជ្រ សំណាង អាយុ៥៥ឆ្នាំ បានលើកឡើងថា ក្រុមអ្នកតវ៉ានេះនឹងបន្តប្រមូលផ្តុំគ្នានៅវត្តភ្នំដែលមានកម្លាំងកងរាជអាវុធហត្ថយ៉ាងតិច១០នាក់ត្រូវបានដាក់ពង្រាយបន្ទាប់ ពីពួកគេទៅដល់។

លោកបានលើកឡើងបន្ថែមទៀតថា "ប្រសិនបើយើងនៅស្ងៀមស្ងាត់ពួកគេនឹងមិនខ្វល់ពីពួកយើងទេ។ ដូច្នេះយើងត្រូវធ្វើឱ្យគេឮសំឡេងរបស់ពួកយើង ដើម្បីស្វែងរកយុត្តិធម៌សម្រាប់ប្រជាជនយើង" ៕ **សុធា**

# ជោគជតារាសីលោកអ្នក

## ទាំង១២ប្រចាំឆ្នាំរោង



### ឆ្នាំជូត



រាល់ការបំពេញការងារទាំងឡាយ លោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

### ឆ្នាំឆ្លូវ



ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំខាល



លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះវាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហា ពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំថោះ



រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

### ឆ្នាំរោង



អាចពោលបានថា លោកអ្នកមានសេចក្ដីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរ នៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំម្សាញ់



រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថ-ប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់ គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

### ឆ្នាំមមី



នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

### ឆ្នាំមមែ



រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

### ឆ្នាំវក



លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

### ឆ្នាំរកា



រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំច



លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំកុរ



លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្ស តាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

# គួរទទួលអាហារដែលមាន ប្រយោជន៍ដល់ឆ្អឹង

ការស្រាវជាវថ្មីៗនេះបានបញ្ជាក់ឱ្យដឹងថា ការទទួលទានអាហារមិនគ្រប់គ្រាន់កង្វះវីតាមីន និងជាតិរ៉ែ គឺសុទ្ធតែជាមូលហេតុបណ្តាលឱ្យកើតជំងឺពុកឆ្អឹងបាន ។ ខាងក្រោមនេះ គឺជារបបអាហារដែលមានប្រយោជន៍ជួយអ្នកជំងឺពុកឆ្អឹង ។

-អ្នកញ៉ាំអាហារបួសឃើញថា មិនសូវកើតជំងឺពុកឆ្អឹងនោះទេ ព្រោះរបបអាហាររបស់ពួកគេច្រើនតែជាបន្លែគ្រាប់ធញ្ញជាតិ និងផ្លែឈើ ។

-អាហារដែលល្អបំផុតសម្រាប់ធ្វើឱ្យឆ្អឹងរឹងមាំ គឺបន្លែពណ៌បៃតង ព្រោះវាសម្បូរជាតិកាល់ស្យូម ព្រមទាំងបន្ថយការបាត់បង់ជាតិកាល់ស្យូមទៀតផង ។ ផ្ទុយទៅវិញ អាហារធ្វើពីទឹកដោះគោគ្រប់ប្រភេទបែរជាបង្កើតការបាត់បង់កាល់ស្យូមទៅវិញទេ ។

-ចូរញ៉ាំអាហារធ្វើពីសណ្តែកសៀងឱ្យបានច្រើន ព្រោះវាសម្បូរ Phyto-oestrogen ។

-កាល់ស្យូមច្រើនរកឃើញក្នុងបន្លែពណ៌បៃតងនិងត្រី ហើយអាហារទាំងនេះមានកាល់ស្យូមច្រើនជាងទឹកដោះគោទៅទៀត ។

-ម៉ាញ៉េស្យូមមាននៅក្នុងអង្ករសម្រូត, ពោត, ផ្លែអាល់ម៉ុង, គ្រាប់ផ្កាឈូករ័ត្ន និងគ្រាប់ល្ពៅ ។

-វីតាមីន D មាននៅក្នុងស៊ុត, ត្រីសម្បូរជាតិខ្លាញ់, សាច់គ្រឿងក្នុង និងទឹកដោះគោ ។ វីតាមីន D ជួយឱ្យរាងកាយបឺតស្រូបជាតិកាល់ស្យូម និងផូស្វ័រដែលជាតម្រូវការរបស់ឆ្អឹង ។

-វីតាមីន K មានសារៈសំខាន់សម្រាប់សុខភាពឆ្អឹង ព្រោះវាជួយរក្សាជាតិកាល់ស្យូមក្នុងឆ្អឹង ។ វីតាមីន K មាននៅក្នុងផ្កាខាត់ណាពណ៌បៃតង និងស្ពៃក្តោបពណ៌បៃតង ។



-នៅពេលអាស៊ីតក្រពះមានតិចក៏ជាកត្តាមួយធ្វើឱ្យកើតជំងឺពុកឆ្អឹងបានដែរ ដូច្នេះចូរញ៉ាំផ្លែម្នាស់ ឬល្ហុងឱ្យបានច្រើនមុនពេលបាយ ដើម្បីជំនួយដល់ការបឺតស្រូបជីវជាតិ ។

-ជាតិរ៉ែស៊ីលីកាក៏មានសារៈសំខាន់សម្រាប់សុខភាពឆ្អឹងដែរ ។

- ជាតិរ៉ែបូរ៉ុនមាននៅក្នុងផ្លែពុទ្រា, ទំពាំងបាយជូក្រាម, ផ្លែឈើ និងបន្លែគ្មានជាតិជូ ៕

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

**វគ្គទី៤**

**បារាំងវិលត្រឡប់មកយកឥណ្ឌូចិនវិញ និងប្រជាពលរដ្ឋខ្មែរតស៊ូយកឯករាជ្យជាលើកទី២**

និពន្ធដោយ ឡឹក សំអឿន ហៅ "ថ្កាយព្រឹក"

នៅថ្ងៃទី៩តុលា ១៩៤៥ ដោយដើរតាមដានជើងនៃកងទ័ពអង់គ្លេស ឧត្តសេនីយ៍បារាំងឈ្មោះ លឺគ្លែរ (Le Clair) បានមកដល់ព្រៃនគរជាមួយកម្លាំងចំនួន៣៥.០០០នាក់ ដែលនៅទីនោះឃើញលោក ឃឹម ទិត ជាតំណាងព្រះបាទនរោត្តម សីហនុ ព្រះចៅក្រុងកម្ពុជាដែលបញ្ជូនមកដោយសម្ងាត់ នៅមុនថ្ងៃឧត្តមសេនីយ៍ ឡឺគ្លែរមកដល់ ដើម្បីសុំការគាំទ្រពីបារាំងតែឥតមានទាមទារអ្វីពីបារាំងសោះឡើយ ។

(កាលពីឆ្នាំ១៨៦៣ ព្រះបាទនរោត្តមបានពឹងបារាំងក្នុងសម័យស្តេច ណាប៉ូឡេអុងទី៣ ដើម្បីឱ្យបារាំងជួយសង្គ្រោះប្រទេសកម្ពុជាឱ្យផុតពីក្រញាំដៃសៀម។ លើកនេះក្នុងឆ្នាំ១៩៤៥ចៅទួតរបស់ព្រះអង្គគឺនរោត្តម សីហនុ ក្នុងសម័យ ដឺហ្គោល ដែលព្រះបាទសីហនុគោរពលើកតម្កើងស្មើ និងព្រះសមណគោតមនោះ បានសុំបារាំង ដឺហ្គោល ជួយការពារកុំឱ្យរាជសម្បត្តិរបស់ព្រះអង្គរលំរលាយ)។

ថ្ងៃទី១៦តុលា ១៩៤៥ ឡឺគ្លែរ បានមកដល់ភ្នំពេញបានបញ្ជាឱ្យចាប់លោក សឺន ង៉ុកថាន់ ដែលសុខចិត្តឱ្យចាប់ដោយឥតមានការតទល់រួចនាំយកទៅឃុំឃាំងឯក្រុងព្រៃនគរ ហើយវិនិច្ឆ័យឱ្យទទួលទោសធ្វើការជាទម្ងន់ចំនួន២០ឆ្នាំ ដោយចោទប្រកាន់ថា លោក សឺន ង៉ុកថាន់ បានធ្វើសកម្មភាពប្រឆាំងនឹងពួកសម្ព័ន្ធមិត្រ។ ប៉ុន្តែដោយសារការស្នើសុំពីក្រុមរាជានុសិទ្ធទៅរដ្ឋាភិបាលបារាំង លោក សឺន ង៉ុកថាន់ ក៏បានត្រូវបារាំងនិរទេសឱ្យទៅប្រទេសបារាំង ។ នៅពេលត្រឡប់ទៅព្រៃនគរវិញ ឡឺគ្លែរក៏បានទុកសក្តិ៥ម្នាក់ឈ្មោះ អ៊ុយ វ៉ា ឱ្យនៅមើលការខុសត្រូវលើវាសនាប្រទេសកម្ពុជា ហើយបានបង្កើតរាជរដ្ឋាភិបាលមួយថ្មីដឹកនាំដោយសម្តេចក្រុមព្រះ មុនីរ៉េត ។ នៅក្នុងគណរដ្ឋមន្ត្រីនេះ មានសម្តេច មុនីពង្ស លោក ឃឹម ទីត្យញ៉ុក ជូឡុងស៊ុម ហ៊ាង និងវ៉ា កាម៉ុល ។

ថ្ងៃទី៤ខែវិច្ឆិកា ១៩៤៥ រដ្ឋមន្ត្រីទី១ មុនីរ៉េត បានធ្វើដំណើរទៅជួបឧត្តមនាវី ដាសង់ឌ៊ីយើរ ជាអគ្គស្នងការបារាំងនៅព្រៃនគរ ។ ឧត្តមនាវីនេះ បានគូសបន្ទាត់នយោបាយឱ្យខ្មែរអនុវត្តឱ្យខ្មែរទទួលយកអាណាព្យាបាលបារាំងឱ្យយ៉ាងឆាប់រហ័ស ។ ដូច្នេះនៅថ្ងៃទី៤ ធ្នូ ១៩៤៥ ស្តេច សីហនុ ដែលជាសាវ័កដ៏ទន់ភ្លន់របស់ ដឺហ្គោល នោះ ក៏សុខចិត្តអនុវត្តជាបណ្តោះអាសន្ននូវសន្ធិសញ្ញា និងកិច្ចសន្យាឆ្នាំ ១៨៦៣ និងឆ្នាំ១៨៦៤ ហើយបានឱ្យតែងតាំងគណកម្មការបារាំង-ខ្មែរមួយសម្រាប់ធ្វើការសិក្សា និងចរចារធ្វើសន្ធិសញ្ញាថ្មីរវាងប្រទេសកម្ពុជា និងប្រទេសបារាំង ។ លុះបានត្រឡប់ពីភ្នំពេញទៅដល់ព្រៃនគរវិញ ឡឺគ្លែរក៏បានចាប់ផ្តើមឱ្យមានសន្តិភាពនៅឥណ្ឌូចិន ។ នៅកូសាំងស៊ីនពេលនោះ ពួកយួនយៀកមិញមិនទាន់មានកម្លាំងខ្លាំងក្លានៅឡើយទេ ហើយមានក្រុមសាសនាជាច្រើនដូចជាពួកហ្វា ហាវ៉្យ កៅដាយ និងបិនស៊ាងជាដើម បានបង្កើតចលនាច្របូកច្របល់មិនដឹងអ្នកណាជាមិត្តអ្នកណាជាសត្រូវឡើយ ។ ដោយមានជំនួយពីអង់គ្លេសមកផង ឡឺគ្លែរ បានវាយបំបែកយ៉ាងធូរនូវការឡោមព័ទ្ធរបស់ពួកយៀកមិញដែលមានមនុស្សនិងសម្ភារៈស្តួចស្តើងជាង។

ថ្ងៃទី២៨មករា ១៩៤៦ កងកម្លាំងអង់គ្លេសបានដកចេញពីព្រៃនគរទុកឱ្យបារាំងនៅកាន់កាប់តែឯង ។ ថ្ងៃទី៥កុម្ភៈ ១៩៤៦ ឡឺគ្លែរ បានថ្លែងប្រាប់អ្នកសារព័ត៌មានថា ការបង្កើតសន្តិភាពនៅឥណ្ឌូចិន និងនៅអណ្តាមក្រោមខ្សែស្របលេខ១៦ បានបញ្ចប់ហើយ តែនៅមានសង្គ្រាមមួយបែបទៀតនឹងកើតឡើង គឺសង្គ្រាមឆ្មក់ដែលពុំអាចឱ្យបារាំងប្រឈមមុខទប់ទល់នឹងសង្គ្រាមនេះបានឡើយ ។ កូសាំងស៊ីនបានស្ងប់ស្ងាត់ហើយ ទាំងកម្ពុជាក៏យកបានមកវិញដោយស្រួលដែរ ឡឺគ្លែរ ត្រូវដោះស្រាយបញ្ហានៅប្រទេសឡាវ និងនៅវៀតណាមខាងជើងលើខ្សែស្របទី១៦ ដែលនៅពេលនោះ មិនគ្រាន់តែជាអង្គការកណ្តាលរបស់យៀកមិញប៉ុណ្ណោះទេ គឺថែមទាំងមានកងទ័ពចិនជាតិនិយមចំនួន១៨០.០០០ នាក់ទៀតផង ដែលនៅកាន់កាប់ទឹកដីតាមសេចក្តីសម្រេចចិត្តរបស់សន្និសីទនៅប៉ុតស្តាំ ។ ដូច្នេះ ឡឺគ្លែរ យល់ឃើញថា ការទៅយកវៀតណាមខាងជើងត្រង់ខ្សែស្របលេខ១៦ និងប្រទេសឡាវនោះ មិនត្រូវធ្វើតាមវិធីក្តុងក្តាំងឡើយ គឺត្រូវធ្វើតាមវិធីចរចាជាផ្លូវទូតនិងតាមផ្លូវនយោបាយជាមួយ ហូ ជីមិញ ដែល ឡឺគ្លែរ បានបញ្ជាទៅអ្នកចរចាខាងបារាំងថា កុំញញើតប្រើពាក្យឯករាជ្យជាមួយ ហូ ជីមិញ ឱ្យសោះ។

ថ្ងៃទី២៨ កុម្ភៈ ១៩៤៦ នៅឌុងគិន បារាំង និងចិនបានចុះហត្ថលេខាលើសន្ធិសញ្ញាមួយ ដើម្បីប្តូរគ្នាដូចតទៅ: **តទៅលេខក្រោយ**

